យោបល់ខ្ញុំ...

*ខ្ញុំយល់ថា សៀវភៅនេះមានប្រយោជន៍ដល់សិស្សានុសិស្ស និងនិស្សិត ព្រមទាំងអ្នកសិក្សាទូទៅច្រើនណាស់ ទើបខ្ញុំខំស្រាវជ្រាវចងក្រងឡើង ដើម្បីជាពន្លឺដល់កុលបុត្រកុលធីតាខ្មែរ ដែលជាអនាគតរបស់ប្រទេសជាតិ ។

*សៀវភៅ គំនិតល្អ !

BELLES PENSÉES ដែលមិត្តកំពុងកាន់អាននេះ ពិតជាសម្ល័ន្ធចេញពីសម្តីអ្នកប្រាជ្ញក្នុងពិភពលោក ដែលមិត្តរកបានដោយកម្របំផុត ។

* ហេតុនេះ ខ្ញុំសូមមិត្តអានឃ្លានីមួយៗឲ្យបានច្រើនដង ហើយពិចារណាដោយយកចិត្តទុកដាក់ នោះមិត្តប្រាកដជាបានយល់ច្បាស់នូវអត្ថន័យ និងអត្ថរសនៃសម្តីអ្នកប្រាជ្ញពុំខាន ។

ភ្នំពេញ ថ្ងៃទី ១ មករា១៩៧៣

ហ៊ុន គឹមស៊ា

## - A -

១. ការស្អាតស្អំ គឺជាគុណធម៌មួយ ។

La propreté est une vertu. ( Augustin )

២. គួរមានត្រឹមតែការសង្ស័យបានហើយ ជាជាងការប្រាកដប្រជាចំពោះរឿងរ៉ាវទាំងឡាយណា ដែលពិបាករកភស្តុតាង ហើយមានគ្រោះថ្នាក់ដល់ការទុកចិត្ត ។

Il vaut mieux penser vers le doute que vers l´ assurance, aux choses de difficile prévue et dangereuse créance. ( Augustin )

៣. ការមិនចុះចាញ់សុភមង្គល គឺជាសុភមង្គលដ៏ធំមួយ ។

C´est un grand Bonheur dense pas être vaine par le Bonheur.

៤. កូនអើយ មិនត្រូវមើលងាយនណាម្នាក់ឡើយ ។ កូនត្រូវចាត់ទុកអ្នកធំជាងកូនជាឪពុកម្តាយ ចាត់ទុកអ្នកស្មើគ្នាជាបងប្អូន និងចាត់ទុកអ្នកទន់ខ្សោយជា កូនរបស់អ្នក ។

Mes enfants, ne méprisez jamais personne. Regardez celui qui est au-dessus de vous comme votre père, votre égal comme votre frère et votre inférieur comme votre fils. ( Ali )

៥. ចំពោះចំណេះដឹងទាំងអស់ ដែលមានប្រយោជន៍ជាងគេ គឺការចេះដឹងទាំងឡាយណា ដែលនាំឲ្យយើងមានទស្សនៈត្រឹមត្រូវចំពោះខ្លួនឯង ហើយនិងបង្ហាត់បង្ហាញខ្លួនយើងឲ្យចេះនូវរបៀបដឹកនាំខ្លួនយើង ។

De toutes les connaissances, la plus utile est celle qui nous donne des notions justes sur nous-même et nous apprend à nous diriger.

៦. ជីវិតមនុស្សខ្លីណាស់ ហើយយើងគ្មានពេលឯណានឹងទៅផ្គាប់ចិត្តជនទាំងឡាយដែលកំពុងធ្វើដំណើរក្នុងទីងងឹតនោះឡើយ ។ ដូច្នេះយើងត្រូវប្រញាប់ប្រញាលកសាងខ្លួនយើងឲ្យល្អប្រសើរឡើង ។

La vie est courte et l´on n´a jamais trop de temps pour réjouir le cœur de ceux qui font avec la sombre traverse. Hâtons-nous d´être bon !

៧. ធ្វើការរហ័សរហួនដោយប្រុងប្រយត្ន័ ដោះស្រាយបញ្ហាដោយឈ្លាសវៃ អនុវត្តដោយអង់អាច អស់ទាំងនេះគឺជលក្ខណ◌ៈនៃមេដឹកនាំដ៏ល្អមួយរូប ។

Se hâter lentement, se résoudre sagement, exécuter hardiment sont les marques d'un bon chef.

៨. ចូរអ្នកស្រលាញ់ចូលចិត្តទៅតាមករណីយកិច្ចរបស់អ្នក ហើយនិងធ្វើកិច្ចការទាំងឡាយតាមចំណង់របស់អ្នកទៅ ។

Aimez, aimez selon le devoir et faites alors que vous voudrez.

**- B -**

៩. ពេលវេលា គឺជាអ្នកកែប្រែដ៏ធំជាងគេបង្អស់ ។

Le plus grand des novateurs c´est le temps. ( Bacon )

១០. មនុស្សចាស់ខ្លាចស្លាប់ ក៏ដូចជាកូនក្មេងខ្លាចទីងងឹតដូច្នោះដែរ ព្រោះវាមិនដឹងជាអ្វី ។

Les homes craignent la mort par la même raison que les enfants ont peur dans les ténèbres, parce qu'ils ne savent pas de quoi il s'agit.

១១. ការនៅស្ងៀមស្ងាត់ជាយោបល់មួយ ហើយមានពេលខ្លះវាជាមេរៀនមួយដែរ ។

Le silence est une opinion. Il est même parfois une leçon.

១២. ការស្អាតស្អំចំពោះខ្លួនប្រាណ ក៏មានលក្ខណៈដូចគ្នានឹងភាពសមរម្យនៅក្នុងទំនៀមទំលាប់ដែរ ។

La propreté est à l´égard du corps ce qu´est la décence dans les mœurs.

១៣. គុណធម៌គ្មានអ្វីក្រៅពីភាពល្អប្រសើរនៅក្នុងដួងចិត្តឡើយ ។

La vertu n´est autre chose qu´une beauté intérieure.

១៤. គ្មានកំហុសណាអាម៉ាស់ និងអាប់យសជាងអំពើក្បត់ទេ ហើយនិងគ្មានអ្វីបាក់មុខជាងអ្នកភូតកុហកឬអ្នកប្រវ័ញ្ច ដែលគេចាប់បានភស្តុតាងជាក់ស្តែងនោះឡើយ ។

Il n´est point de vice plus honteux et plus dégradant que celui de la perfidie, ni de rôle plus humiliant que celui d´un menteur ou d´un fourbe pris sur le fait.

១៥. អភិមាន: (ការលើកតំកើងខ្លួនឯងជ្រុលពេក) ជាអំពើអាក្រក់មួយដែលមិនអាចរាប់អានបានទោះយើងប្រៀបធៀបទៅនឹងអំពើអាក្រក់ទីទៃទៀតក៏ដោយ ។

L´orgueil est un vice insociable, même par rapport aux autres vices.

១៦. សេចក្តីស្នេហាមានភាពផ្អែមល្ហែម លន្លង់លន្លោច គ្រប់បែបយ៉ាង ហើយនិងផ្ទុកនូវទោសៈ ។

L´amour a touts les charmes d´une sirène et les transports d´une furie.

១៧. សភាពសំបូរហូរហៀរជាអ្នកបំរើដ៏ល្អ ក៏ប៉ុន្តែវាជាម្ចាស់ដ៏អាក្រក់ ។

L´opulence: bonne servant, mauvaise maitresse.

១៨. ការមើលងាយចំពោះសកម្មភាពនៃមនុស្សចាស់ គឺជាចរិតពីកំណើតរបស់យុវជន, គេធ្វើបែបនេះ គឺដើម្បីឲ្យខ្លួនគេម្នាក់ៗឆ្លាតវាងវៃចំពោះកំហុសរបស់គេតែប៉ុណ្ណោះ ។

Le mépris pour l´autorité de la vieillesse est un sentiment inné dans les jeunes gens: c´est afin que chacun devienne sage à ses propres dépens.

១៩. សេចក្តីស្នេហាចំពោះមាតុភូមិ ចាប់ផ្តើមពីសេចក្តីស្នេហាចំពោះគ្រួសារ ។

L´amour de la patrie commence à la famille.

២០. តាំងពីខ្ញុំកើតមក ខ្ញុំតែងលឺគេនិយាយថា "លោកនេះ នាងនោះ រៀបអាពាហ៍ពិពាហ៍យ៉ាងល្អ" ។ ដូច្នេះ តើអ្នកដទៃគេរៀបអាពាហ៍ពិពាហ៍យ៉ាងអាក្រក់ឬ ?

J´entends dire depuis que je suis au monde: "Monsieur au tel, ou Mademoiselle une telle, a flat un bon mariage"; il faut donc que l´autre en ait fait un mauvais ?

២១. អាពាហ៍ពិពាហ៍ គឺជាវិទ្យាសាស្ត្រ ។ មនុស្សប្រុសមិនអាចនឹងរៀបអាពាពិពាហ៍ដោយពុមបានពិចារណាដោយពុំបានពិចារណា សិក្សា វិភាគឲ្យម៉ត់ចត់អំពីស្ត្រីបានឡើយ ។ ចំពោះស្នេហា ព្រលឹងគេទុកឲ្យនៅមួយកន្លែង, ស្ត្រីចាត់ទុកដូចជាពិណមួយ ដែលនឹងអាចបញ្ចេញសម្លេងដ៏អាថ៌កំបាំងរបស់វាតែជាមួយជនណាដែលចេះកេះប្រើវាយ៉ាងស្ទាត់ជំនាញប៉ុណ្ណោះ ។

Le mariage est une science. Un home ne peut se marier sans avoir étudier l´anatomie et disséqué une femme au moins, En amour, toute âme mise à part, la femme est comme une lyre qui ne livre ses secret qu'à celui qui en sait bien jouer.

២២. ទឹកមុខញញឹមរបស់ស្ត្រី ដែលចេះអត់ទ្រាំទទួលការអាម៉ាស់ អាចធ្វើឲ្យដុំសិលាបែកខ្ទាយបាន ។

Le sourie des femmes résignées fendrait le granit.

២៣. គេធ្វើឲ្យភាសាមានលក្ខណៈល្អថ្លៃថ្នូរ ដោយសារគំនិត មិនមែនដោយសារសម្ដីទេ ។

Ce n'est point par les mots qu'on rajeunit une langue, c'est par les idées.

២៤. ទឹកចិត្តដែលឈឺចាប់ ហើយអង់អាចក្លាហាន គឺជាទឹកចិត្តដែដ៏ប្រសើរឧត្ដម ។

Les cœurs qui sont malheureux et qui sont brave ce sont  les grand cœurs.

២៥. ជីវិតមនុស្សមិនមែនកើតមកសម្រាប់រស់នោះទេ ក៏ប៉ុន្តែគឺសម្រាប់ប្រយុទ្ធយកជ័យជំនះ ។

La vie n'est pas faite pour être vécue, mais pour être vaincue.

២៦. ប្រសិនបើគ្មានសេរីភាពស្ដីបន្ទោស ក៏វាពុំអាចមានពាក្យសរសើរ បញ្ចើចបញ្ចើរដែរ ។

Sans la liberté de blâmer, il n'est point d'éloge flatteur.

២៧. សម្លេងបេះដូងដែលកំពុងមានការស្រលាញ់ជោគជាំ វាពិរោះជាងភ្លេងអ្វីទាំងអស់នៅលើលោកយើងនេះ ។

De toutes les musiques terrestres, la plus douce est le battement d´un Cœur aimant.

( Beacher. Stowe )

២៨. ព្រលឹងមិនមែនរបស់អ្វីក្រៅអំពីកូនព្រែកតូចៗនោះឡើយ ហើយនៅចន្លោះព្រែកតូចៗទាំងនោះវាមានទន្លេធំនៃជីវិតដែលហូរកាត់តួខ្លួនមនុស្សលោក ។

Les âmes ne sont pas autre chose que les ruisselets entre lesquels se partage grand fleuve de la vie coulant à travers le corps de l'humanité.

**( Bergson )**

២៩. មនុស្សយើងរកសុភមង្គលឲ្យខ្លួនយើងបាន លុះត្រាតែយើងនឹកគិតដល់សុភមង្គលនៃអ្នកដទៃផង ។

On ne fait sou Bonheur qu´en s´occupant de celui des autres.

៣០. អ្នកធ្វើការពិសោធន៍ ត្រូវគិតឲ្យផុតពីគំនិតនឹងន ហើយត្រូវរក្សាទុកជានិច្ចនូវសេរីភាពខាងគំនិត ។

L'expérimentateur doit fuir les idées fixes et garder toujours liberté d'esprit.

៣១. ការកំណាញ់ពេលវេលា គឺជាប្រការតែមួយគត់ដែលគេអាចអនុគ្រោះឲ្យបាន ។

La seule avarice qui soit permise est celle du temps.

៣២. មនោសញ្ចេតនាខ្ពង់ខ្ពស់ សមានចិត្តរស់រវើក ចំណង់ដ៏សាមញ្ញ ទាំងអស់នេះបង្កើតបានមនុស្សម្នាក់ ។

Des sentiments élevés, des affections vives, des gouts simples font un home.

៣៣. សេចក្ដីសុខជារង្វាន់នៃសេចក្ដីស្មោះត្រង់ និងសេចក្ដីសុចរិត ។

La sécurité est la récompense de la droiture et de l´innocence.

៣៤. ទ្រឹស្ដីទាំងអស់ទាក់ទងនឹងទំនៀមទំលាប់ សំរាប់នាំយើងទៅរកសេចក្ដីសប្បាយរីករាយតែប៉ុណ្ណោះ ។

Toute la doctrine des mœurs tend uniquement à nous rendre heureux.

៣៥. ការបានស្គាល់នូវសុភមង្គល គឺការមិនច្រណែនចំពោះសុភមង្គលនៃអ្នកដទៃ ហើយពេញចិត្តនឹងសុភមង្គលរួម ។

C´est jouir du Bonheur que de voir sans envie le Bonheur des autres et avec satisfaction le Bonheur commun.

៣៦. កិច្ចការខួរក្បាល គឺជាការសម្រាកដ៏ប្រសើរបំផុតនៃខ្លួនប្រាណ ។

Le travail de l´esprit est le meilleur et le plus salutaire repos du corps. ( Bouchardot )

៣៧. កន្លែងធ្វើការនៅក្នុងរដ្ឋាភិបាលមានមិនច្រើនទេ ។ ដូច្នេះជនទាំងអស់ដែលជឿជាក់ថាខ្លួនមានលទ្ធភាពបំរើប្រទេសជាតិរបស់ខ្លួនបានល្អប្រពៃនោះ សុទ្ធតែអន្ទះសារចង់ធ្វើការនៅកន្លែងនោះ ។

Les places du gouvernement ne sont pas nombreuses. Elles doivent être noblement envies par tous ceux qui croient avoir en eux la possibilité de bien server leur pays.

( Briand )

៣៨. តាមយោបល់ខ្ញុំ ជនណាដែលរស់នៅ ហើយមិនព្រមក្រេបជញ្ជក់ឱជារសនៃជីវិតទេ គឺជាខ្មោចបីសាច ទោះជាជននោះមានសាច់មានឆ្អឹងគ្រប់លក្ខណៈយ៉ាងណាក៏ដោយ ។

Celui qui ne goute pas la vie est pour moi un fantôme, quoiqu'il ait les attributs de la chair. ( Browne )

៣៩. មិត្តភាព គឺជាសេចក្តីស្នេហាគ្មានស្លាប ។

L'amitié, c'est l'amour sans ses ailes.

☆ ☆ ☆

## _C_

៤០. កាលណាគេសប្បាយរីករាយ ហើយនិទ្រាយូរពេក វានាំឲ្យអាម៉ាស់ដល់សុភមង្គលទៅវិញទេ ។

C'est insulter au Bonheur que de dormir longtemps quand on est heureux.

( Calderon de la Barca )

៤១. ត្រូវនិយាយនូវកាលណាដែលយើងចេះ ហើយនិងមិនត្រូវនិយាយសោះនូវការដែលយើងមិនចេះ ។

Parler de ce qu'on ne connaît pas du tout de ce qu'on ignore.

៤២. សម្តីនិយាយសម្រាប់មនុស្សទូទៅ ហើយគតិបណ្ឌិតសម្រាប់មនុស្សមួយចំនួនតូច ។

La parole est donnée à tous, la sagesse au petit nombre.

៤៣. យើងត្រូវរំលឹកញយៗនូវអំពើដែលគេធ្វើចំពោះយើង ក៏ប៉ុន្តែយើងមិនត្រូវនិយាយមួយម៉ាត់ឡើយ នូវអំពើល្អដែលយើងបានធ្វើចំពោះអ្នកដទៃ ។

Répète volontiers le bien que l'on t'a fait pour celui que tu fais aux autres, n'en dis mot.

៤៤. គុណធម៌ត្រូវបានពួកមនុស្សពាលសាហាវជាន់ឈ្លី ច្រើនជាងមានមនុស្សល្អលើកស្ទួយគាំទ្រ ។

La vertu est plus vivement persécutée par les méchants qu´elle n´est soutenue par gens de bien.

៤៥. កាលណាគេចង់ធ្វើអ្វីមួយ គេធ្វើតាមចិត្តគេចង់ ។ កាលណាគេធ្វើតាមចិត្តគេចង់ហើយ គេសប្បាយ ។ កាលណាគេសប្បាយហើយ គេគ្មានអ្វីចង់ទៀតទេ ។ កាលណាគេគ្មានចង់អ្វីទៀតទេ តើគេត្រូវការអ្វីទៀត ?

Quand on fait ce qu´on veut, on fait à sa fan-taise. Quand on fait à sa fantaisie, on est content. Quand on est content, on a plus rien à désirer. Et quand on n´a plus rien à désirer, que faut-il de plus?

៤៦. មនុស្សដែលគិតតែប្រយោជន៍ផ្ទាល់ខ្លួន អាចនឹងដុតផ្ទះយើងដើម្បីស្ងោរពងមាន់មួយ ។

L´égoïste brûlerait votre maison pour se faire cuire un œuf.

៤៧. ប្រការដែលថោកទាបអាក្រក់មើលជាងគេក្នុងរឿងទំនាស់ខាងអាពាហ៍ពិពាហ៍ គឺការដែលមានចិត្តគំនិតមិនត្រូវរ៉ូវគ្នា ។

Le pire de toutes les mésalliances est celle du cœur.

៤៨. សុភមង្គលវាដូចគ្នានឹងនាឡិកាដែរ ។ មួយណាមិនសូវស្មុគស្មាញ មួយនោះក៏ធ្វើទុក្ខយើងតិចដែរ ។

Il en est du Bonheur comme des montres: les moins compliquées sont celles qui se dérangent le moins.

៤៩. មនុស្សមានទ្រព្យច្រើនជាងគេក្នុងលោក គឺមនុស្សចេះសន្សំសំចៃ ។ មនុស្សក្រខ្សត់ជាងគេ គឺមនុស្សកំណាញ់ស្វិត ។

Le plus riche des homes, c´est l´économe, le plus pauvre, c´est l´avare.

៥០. ដើមឈើនៃការពិត វាលូតលាស់តែនៅលើផ្នូរខ្មោចប៉ុណ្ណោះ ។

La lecture est une partie du devoir de l'honnête home.

៥៨. មិត្តភាពយូរឆ្នាំ ប្រៀបបានទៅនឹងស្រាទំពាំងបាយជូរ ទុកវាកាន់តែយូរ វារឹតតែឆ្ងាញ់មួយកម្រិតថែមទៀត ។

La vieille amitié est comme le vin, la plus ancienne est la plus douce.

៥៩. ចង់មានទ្រព្យសម្បត្តិ គឺថាកុំលោភលន់ហួសមាឌពេក ហើយបើចង់បានផលកម្រៃ ត្រូវកុំទម្លាប់ទិញរបស់អ្វីច្រើនពេក ។

C'est d'être riche que de n'être pas cupide. C'est une revenue que de n'avoir pas la manie d'acheter.

៦០. បន្ទាប់ពីយើងបានគោរពចំពោះខ្លួនហើយ បើត្រូវការចង់ឲ្យអ្នកដទៃគោរពយើង ក៏ជាគុណធម៌មួយដែរ ។

Après votre estime, c'est une vertu que de désire l'estime des autres.

៦១. អ្នកណាក្រោយញាប់ប្រញាលរៀបអាពាហ៍ពិពាហ៍ពេក នឹងត្រូវស្តាយក្រោយរកទីបំផុតគ្មាន ។

Qui se marie à la hâte se repent à loisir.

៦២. សុភមង្គល គឺជាការចែករំលែកសុភមង្គលឲ្យទៅគេខ្លះ ។

Le Bonheur, c'est en donner.

៦៣. គេមិនអាចនឹងសំអាងលើវិចារណញ្ញាណអ្វី ដើម្បីធ្វើការប្រឆាំងនឹងប្រទេសជាតិមាតុភូមិរបស់ខ្លួនបានឡើយ ។

On ne peut avoir raison contre son pays.

( Courier )

៦៤. បន្ថែមទៅលើចំណុចមួយ គេអាចនិយាយបានថា បញ្ហាសង្គមមនុស្សបង្រួញឲ្យខ្លីមក គឺបិតនៅលើបញ្ហាសុឆន្ទៈ ។

On peut dire que, sur plus d´un point. La question sociale se résume à une question de bonne volonté. ( courteline )

៦៥. សេចក្ដីសប្បាយក្នុងការប្រាថ្នាចង់បាន មានតម្លៃថ្លៃណាស់ ត្បិតអ្វី ព្រហ្មលិខិតពុំមែនចែកទ្រព្យសម្បត្តិឲ្យយើងឡើយ គឺវាត្រូវលក់ទៅវិញ ។

La joie de l´ambition est chèrement achetée car la fortune ne donne ses faveurs; elle les vend.

៦៦. ត្រូវនឹកគិតទៅដល់ការដែលត្រូវធ្វើ ដល់ការធ្វើឲ្យបានច្រើន ធ្វើឲ្យល្អ នឹកគិតទៅដល់ការដែលមាន ហើយនិងកុំនឹកគិតដល់ការដែលនឹងកើតមានឡើយឲ្យសោះ ។

Il faut songer à faire, à beaucoup faire à bien faire, à être et non pas à paraître.

**_D_**

៦៧. គ្មានសេចក្ដីឈឺចាប់ណា ធំជាងក្នុងពេលដែលកំពុងគិតពីរឿងសប្បាយស្រាប់តែមានរឿងអកុសលមកដល់នោះទេ ។

Il n'y a pas de plus grande douleur que de se souvenir des jours heureux quand est venu le Malheur.

៦៨. តើគេនាំយកមាតុភូមិរបស់ខ្លួនទៅជាមួយ ដោយដាក់នៅនឹងបាតស្បែកជើងឬអ្វី ?

Est-ce qu'on emporte sa patrie à la semelle de son soulier ?

៦៩. ការសុខចិត្តទទួលយកសេចក្ដីវេទនា វាអាចមានការឈឺចាប់ស្រាលជាងការស្វែងរកសុភមង្គល ។

L'acceptation du Malheur est peut-être moins douloureuse encore que la recherche du bonheur.

៧០. ឱសថដែលមានប្រសិទ្ធភាពបំផុតក្នុងការព្យាបាលសេចក្ដីលោភលន់ គឺពិនិត្យមើលស្រង់ការពិសោធន៍ពីមនុស្សណាដែលខកចិត្ត អស់សង្ឃឹមចំពោះសេចក្ដីថ្លៃថ្នូររបស់ខ្លួន ហើយសុខចិត្តត្រលប់មករស់នៅក្នុងជីវភាពជារាស្ដ្រសាមញ្ញវិញ ។

Le plus sure remède contre l'ambition, c'est observer de près les homes qui déchus de leurs dignités sont rentrés dans la condition des simples citoyens.

៧១. សេចក្ដីប៉ងប្រាថ្នាវានឹងលួងលោមអ្នក ប្រសិនបើអ្នកដឹងថា ក្នុងមួយជីវិតអ្នកពុំអាចនឹងរស់នៅដោយសប្បាយ ដោយគ្មានការមួរហ្មងនោះទេ ។

L´envie se consolerait si elle savait qu´on n´est point heureux impunément.

៧២. ប្រសិនបើស្រីៗជាផ្កានៃធម្មជាតិទាំងអស់គ្រប់ទីកន្លែងមែន គឺក្រុងភ្នំពេញនេះឯងហើយដែលទទួលនូវក្លិនក្រអូបជាងគេ ។

Si les femmes sont partout les fleurs de la nature, c´est Phnom Penh qui reçoit leurs plus douces exhalaisons.

៧៣. អ្នកត្រូវលួងលោមចិត្តអ្នក ប្រសិនបើអ្នករងគ្រោះដោយអំពើអយុត្តិធម៌ ហើយសេចក្ដីទុក្ខកង្វល់របស់អ្នក គឺការដែលអ្នកប្រព្រឹត្តនូវអំពើអយុត្តិធម៌ទាំងនោះ ។

Si tu supports des injustices, console-toi, la véritable tristesse est de commettre ces injustices.

៧៤. កាលណាមានគេឈ្លានពានប៉ះពាល់មកលើខ្ញុំ ខ្ញុំនឹងខំប្រឹងលើកកម្ពស់ព្រលឹងខ្ញុំឲ្យខ្ពស់ទាល់តែអំពើរំលោភនោះមិនអាចប៉ះពាល់ព្រលឹងខ្ញុំបាន ។

Quand on me fait une offense, je tâche d'élever mon âme si haut que l'offense ne par vienne pas jusqu'à elle.

៧៥. គេចាប់ផ្ដើមចាស់ ក្នុងពេលគេកំព្រាម្ដាយ ។

On ne commence à vieillir que lorsqu′on a perdu sa mère.

៧៦. ថ្នាំបន្សាបដ៏ខ្លាំងជាងគេ សម្រាប់រំងាប់ការសប្បាយភ្លើតភ្លើនដ៏ថោកទាប គ្មានអ្វីប្រសើរជាងចំណូលចិត្តចំពោះសោភ័ណភាពនោះឡើយ ។

Il n′y a pas de plus puissant antidote contre la basse sensualité que l′adoration de la beauté.

៧៧. នៅជិតស្តេចមានសត្វពីរយ៉ាង: មនុស្សកាចសាហាវ និងមនុស្សទ្បេមទ្បឹម ។ មនុស្សទ្បេមទ្បឹម គឺមនុស្សលើកជើងបញ្ជោរស្តេច ឬមនុស្សកាចសាហាវវិញ គឺជាជនដែលចាក់រុកស្តេចឲ្យធ្វើបាបគេ ។

Les princes ont à leurs ôtés deux sortes de bêtes: les farouches et les privées: les privées sont les flatteurs, les farouches sont les délateurs.

៧៨. មនុស្សខ្ជិលច្រអូស វាដឹងតែមួយមុខតែមួយមុខប៉ុណ្ណោះថា ក្នុងការងារវាមានពេលឈប់សម្រាកជានិច្ច ។

Les paresseux ne sauront-ils donc jamais qu′il n′y a de repos que dans l′activité.

( Doudan )

៧៩. អ្នកមិនត្រូវធ្វើអំពើណាមួយចំពោះអ្នកដទៃឡើយ ក្នុងពេលដែលអ្នកពុំចង់ឲ្យគេធ្វើអំពើនោះតបមកអ្នកវិញ ។

Ne faites pas à autrui ce que vous ne voudriez pas qui vous fût fait.

៨០. ការនិយាយមួលបង្កាច់គេជាការចង្អៀតចង្អល់ក្នុងសតិអារម្មណ៍ ឬក៏ជាចិត្តខ្មៅកខ្វក់ ។ ការនិយាយមួលបង្កាច់គេ តែងតែកើតឡើងពីការច្រណែនសេចក្តីលោភលន់ កំណាញ់ ឬក៏មកពីតណ្ហាផ្សេងៗទៀត ។ ការនិយាយមួលបង្កាច់គេ គឺជាការបញ្ជាក់ឲ្យឃើញនូវសភាពល្ងង់ខ្លៅ និងការព្យាបាទ ។ ដូច្នេះចូរអ្នកនិយាយមួលបង្កាច់គេត្រូវពិចារណាអំពីរឿងនេះ ។

La médisance est une petitesse dans l´esprit ou une noirceur dans le cœur: elle doit toujours naissance à la jalousie, à l´envie, à l´avarice ou à quelque autre passion; elle la preuve de l´ignorance et de la malice. Que le médisant choisisse qu´il opte.

៨១. ការឆ្មើងឆ្មៃនៅក្នុងចិត្ត គឺជាលក្ខណៈនៃមនុស្សស្មោះត្រង់ ។ រីការឆ្មើងឆ្មៃនៅក្នុងអាក្បកិរិយា គឺជាលក្ខណៈនៃមនុស្សឆ្កួត ។

La fierté du cœur est l´attribut des hommes gens; la fierté des manières est celle des sots.

៨២. ការល្ងង់មានបីយ៉ាងៈល្ងង់មិនដឹងអ្វីទាំងអស់នេះ១, ល្ងង់ដឹងខុសពីការដែលខ្លួនដឹងនេះ១ និងល្ងង់ដឹងផ្សេងពីការដែលខ្លួនត្រូវដឹងនេះ១ ។

Il y a trois sortes d´ignorance : ne rien savoir mal ce qu´on sait, et savoir autre chose, que ce qu´on doit savoir.

៨៣. អ្នកស្រលាញ់សេរីភាពពិតប្រាកដ អ្នកនោះក៏ស្រលាញ់សេរីភាពនៃអ្នកជិតខាងផងដែរ ។

L´homme qui aime vraiment la liberté aime aussi celle de son voisin. ( **Ducros** )

៨៤. តណ្ហាសម្បុរខ្មៅ ស្នេហាសម្បុរទង់ដែង ។

La passion est brune, l´amour est blond. ( Dumas )

៨៥. ស្រីៗមានស្នេហា តែមិនចេះស្រលាញ់ ។

Les femmes aiment, mais ne savent pas aimer. ( Dumas )

⋆ ⋆ ⋆

## _ E _

៨៦. ការចង់បានការពិត វាងាយស្រួលជាងការលាស់ខ្លួនចេញពីការភ័ន្តច្រឡំ ។

Il est plus aisé de désirer la vérité que de se débarrasser de l'erreur. ( Eddy )

៨៧. ដែកថែបវាមានប្រយោជន៍ជាងដែក គឺមកពីគេលត់សំអិតសំអាងជាងដែក ។

L'acier n'a l'avantage sur le fer que le travail qui lui a fait acquérir plus de perfection.

( Epictête )

៨៨. កាលណាគេនិយាយអាក្រក់ពីអ្នក ហើយបើត្រូវចំលើការពិត អ្នកត្រូវកែកំហុសនោះចេញ ។ ក៏ប៉ុន្តែបើខុសវិញអ្នកត្រូវសើច ។

Si l'on dit du mal de toi et qu'il soit véritable, corrige- toi; si ce sont des mensonges, ris-en.

៨៩. អ្នកមិនត្រូវធ្វើអ្វីសោះឡើយក្នុងពេលមានកំហឹង ។ តើអ្នកត្រូវបើកក្ដោងឬ នៅពេលកំពុងមានខ្យល់ព្យុះ ?

Ne fait rien dans la colère. Mettrais-tu à la voile pendant la tempête ?

៩០. ខ្ញុំស្រលាញ់គ្រួសារខ្ញុំជាងរូបខ្ញុំ ខ្ញុំស្រលាញ់មាតុភូមិខ្ញុំជាងគ្រួសារខ្ញុំ ក៏ប៉ុន្តែខ្ញុំស្រលាញ់មនុស្សលោកជាងមាតុភូមិខ្ញុំទៅទៀត ។

J'aime mieux ma famille que moi-même; j'aime mieux ma patrie que ma famille, mais j'aime encore mieux le genre humain que me patrie. ( Fénélon )

៩១. ប្រសិនបើផិតក្បត់ទៅមានសាហាយ វានឹងនាំឲ្យមានជ្រួលច្របល់នៅក្នុងគ្រួសាររបស់ខ្លួន ចុះបើប្រុសៗមានចិត្តមិនស្មោះត្រង់វិញ តើវានឹងនាំឲ្យមានការជ្រួលច្របល់ដល់គ្រួសារអ្នកដទៃឬទេ ?

Si l'infidélité d'une femme met le trouble dans sa famille, les infidélités des homes ne mettent- elles pas le désordre dans la famille des autres ?

៩២. សុភមង្គលនៃសេចក្តីស្នេហា និងក្នុងការធ្វើកុសលធម៌ គឺមាគ៌ាដឹកនាំឆ្លងកាត់គំនុំគុំគួននិងកំហឹង ។

Le Bonheur d'aimer et d'être bon est le chemin qui conduit à travers les haines et les colères. ( **Figuière** )

៩៣. សុភមង្គលមួយរយៈពេល គឺជាសេចក្តីសប្បាយជាអមតៈ ។

Un instant de Bonheur est une joie éternelle.

៩៤. ទៅភ័យបារម្ភធ្វើអី បើយើងចេះតែដើរទៅមុខហើយនោះ ។

Qu'importe que l'on tremble si l'on marche avance.

៩៥. សើចនិងយំ គឺជាជីវិតប្រកបដោយការបោកប្រាស់ ។

Rire et pleurer, c'est la vie en grimaces.

៩៦. មនុស្សដែលខ្លាំងជាងគេ គឺមនុស្សដែលក្លៀវក្លាជាងគេ ។ ការតស៊ូប្រកបដោយសេចក្តីក្លៀវក្លា គឺបានន័យថា បានជ័យជំនះពាក់កណ្តាលរួចស្រេចទៅហើយ ។

L'homme le plus fort est le plus enthousiaste. C'est être à moitié vainqueur que d'entre prendre la lutte avec enthousiasme.

៩៧. ស្រីដែលមានសម្រស់តិចតួចបំផុត ក៏ដឹងខ្លួនថាមានគេស្រលាញ់ខ្លួនដែរ ដឹងមុនពេលដែលគេនឹងស្រលាញ់ខ្លួនទៅទៀត ។

La moins coquette des femmes sait qu'on est amoureuse d'elle, un peu avant celui qui en devient amoureux. ( **Florian** )

៩៨. ពេលវេលាជាអ្នកបោកប្រាស់ ការលាក់លៀមនូវបច្ចុប្បន្នកាល តែវាធ្វើឲ្យអនាគតភ្លឺស្វាង ។

Le temps est un charlatan qui escamote le présent en faisant briller l'avenir.

**( Fortenelle )**

៩៩. តមមិនស៊ី វាស្រួលជាងហាល់ហើយខំប្រឹងលេបបង្ហើយ ។

Il est plus facile de s'abstenir que de sa contenir.

១០០. ការសំញែងបង្ហាញមានពីរយ៉ាង: ម្យ៉ាងគឺបង្ហាញដោយចេញមុខ( គ្មានអ្វីសោះ ) ម្យ៉ាងទៀត បង្ហាញដោយលាក់នូវអាថ៌កំបាំងទាំងអស់ ។

Il y a deux sortes d'ostentation: une ostentation qui se montre en faisant étalage d'un rien, et une ostentation qui se cache en faisant mystère de tout.

១០១. គេតែងប្រមាថមាក់ងាយ ពុំសូវគិតដល់ផលប្រយោជន៍កំប៉ិកកំប៉ុកទេ ក៏ប៉ុន្តែគេពុំបានមើលងាយឡើយ ចំពោះគ្រោះថ្នាក់តូចតាចទាំងឡាយ ។

On dédaigne de sentir les petits biens, et on n'a pas le même mépris pour les mieux médiocres.

១០២. ចូរអ្នកនាំមនុស្ស៤នាក់ដែលជឿតាមពាក្យចចាមអារាមផ្តេសផ្តាសបំផុតមកឲ្យខ្ញុំ ប្រាកដជាខ្ញុំអាចបោកប្រាស់អាចបោកប្រាស់មនុស្សពីរលាននាក់ទៀតដែលជឿរបៀបនេះ ដោយយកមនុស្ស៤នាក់ខាងលើមកធ្វើជាមធ្យោបាយ ។

Donnez-moi quatre personnes persuadées de l ´opinion la plus absurde, et je suis sûr d´en persuader avec elles deux millions d´autres.

១០៣. ដើម្បីវិនិច្ឆ័យតម្លៃនៃវណ្ណកម្មមួយ គេត្រូវពិនិត្យនូវវណ្ណកម្មនោះដោយផ្ទាល់ ក៏ប៉ុន្តែដើម្បីវិនិច្ឆ័យគុណូបការគុណនៃអ្នកនិពន្ធគេត្រូវធ្វើការប្រៀបធៀបអ្នកនិពន្ធនោះទៅនឹងសតវត្សរ៍នោះ ។

Pour juger de la beauté d´un ouvrage,, il suffit de le considérer en lui-même, mais pour juger du mérite de l’auteur, il faut le comparer à son siècle.

១០៤. កាលណាចិត្តមនុស្សវាសុខសាន្តហើយ តើនៅលើសកលលោកនេះមានវត្ថុអ្វីមានន័យជាងនេះទៅទៀត ?

Qu´est-ce que toutes les choses de cette vie, en comparaison de la paix du cœur ?

១០៥. សេចក្ដីសប្បាយរីករាយនៃមិត្តភាពពិតប្រាកដ គឺជាថ្នាំក្រអូបធ្វើឲ្យឈាមរត់ស្រួល និងធ្វើឲ្យខ្លួនមនុស្សយើងត្រលប់ទៅជាក្មេងខ្ចី ។

La joie de la vraie amitié est un baume qui adoucit le sang et qui rajeunit l´homme.

១០៦. ការចូលចិត្តរកកំហុសអ្នកដទៃ គឺជាសញ្ញាថា គេពុំសូវរកកំហុសខ្លួនគេឡើយ ។

S´amuser à rechercher les défauts d´autrui, c´est signe qu´on ne s´occupe guère des siens.

១០៧. កង់រទេះដែលមិនដាក់ខ្លាញ់វាលឮង៉ែតង៉តខ្លាំងណាស់ ហើយចំពោះមនុស្សដែលមិនអំណត់ ក៏មានការត្អូញត្អែរខ្លាំងណាស់ដែរ ។

La roule la plus graissée est celle qui fait le plus de bruit, et qui a le mois de patience est celui qui fait sonner ses-plaintes le plus haut.

១០៨. ការស្រេកឃ្លានវាសម្លឹងមើលផ្ទះអ្នកឧស្សាហ៍ធ្វើការដែរ ក៏ប៉ុន្តែវាមិនហ៊ានបើកទ្វារចូលឡើយ ។

La faim regarde la porte de l´homme laborieux, mais n´ose pas l´ouvrir.

១០៩. នៅក្នុងសកលលោកយើងនេះ មានសត្រូវច្រើនយ៉ាងណាស់ ហើយយើងកុំគប្បីបង្កើតវាថែមទៀតឡើយ ។

On trouve une multitude d´ennemis dans le monde, il ne faut pas s´en faire de gaité de cœur. ( Frédéric le Grand )

១១០. តាមក្បួនលេខគណិត មួយនិងមួយត្រូវជាពីរ ក៏ប៉ុន្តែបើចំពោះមិត្តភាពវិញ មួយនិងមួយត្រូវជាមួយ ។

En arithmétique, un et un font deux, mais en amitié, un et un font un.

១១១. ការកសាងខ្លួនឲ្យរឹតតែបានល្អ ជាមធ្យោបាយតែមួយដើម្បីឲ្យខ្លួនយើងមានឥទ្ធិពលល្អទៅលើអ្នកដទៃ ។

L´amélioration de soi-même est l´unique moyen d´exercer une bonne influence sur autrui.

## _G_

១១២. មនុស្សលោកគឺជាទាសករ ព្រោះពុំទាន់បានរំងាប់គំនិតអាត្មានិយមនៅក្នុងខ្លួន ។

Les êtres sont esclaves parce qu´ils n´ont pas encore détruit en eux l´idée du moi.

( Gautama )

១១៣. គូរសង្សារស្នេហាទាំងអស់សុទ្ធតែស្បថស្បែឲ្យស្នេហារបស់ខ្លួន ឋិតនៅគង់វង្សជាស្ថាពរ ក៏ប៉ុន្តែស្ថាពរនៃសេចក្តីស្នេហានោះឋិតនៅក្នុងកណ្តាប់ដៃអាទិទេពឯណោះទេ ។

Tous les amoureux es jurent un amour éternel; mais à dieu appartient cette éternité.

( Gautier )

១១៤. នៅក្នុងលក្ខណៈជាទូទៅរបស់ខ្លួន គ្រឹស្តសាសនាគឺគ្រាន់តែជាការដាក់ទានដ៏ធំមួយប៉ុណ្ណោះ ។

Le christianisme n´est dans son ensemble qu´une grande aumône faite à une grande misère.

១១៥. សៀវភៅមួយក្បាលអាចសម្រេចជីវិតរបស់កូនក្មេងម្នាក់បាន ។

Un livre peut décider de la vie d´un enfant.

១១៦. មនុស្សម្នាក់ៗទទួលការអប់រំពីរយ៉ាង: ម្យ៉ាងបានមកពីអ្នកដទៃ ម្យ៉ាងទៀតបានមកពីខ្លួនឯង ដែលមានសារៈសំខាន់ច្រើនជាងគេ ។

Tout home reçoit deux sortes d´éducation l´une qui lui est par les autres et l´autre, beaucoup plus importante, qu´il se donne à lui même. ( Cibbon )

១១៧. សុភមង្គលមានពីរយ៉ាង: សុភមង្គលបុណ្យសក្តិ និងសុភមង្គលមនោសញ្ចេតនា ។ មួយបិតនៅក្នុងសង្គមមនុស្ស មិងមួយទៀតបិតនៅក្នុងការស្និទ្ធស្នាល ។

Il y a deux sortes de Bonheur, le Bonheur de position et le Bonheur sentiment: l´un, pour ainsi dire , est social l´autre intime. ( Giradin )

១១៨. តើមានស្រីណាម្នាក់ ដែលគ្មានមនុស្សប្រុសស្រលាញ់ ?

Quelle est la femme qui n´a pas un adorateur?

១១៩. ជីវភាពទំនេរ គឺជាសេចក្តីស្លាប់មុនអាយុអស់ ។

Une vie oisive est une mort anticipée. ( Goeth )

១២០. មានកញ្ចក់សម្រាប់ឆ្លុះមើលខួរក្បាលមនុស្សឡើយ ។ ហេតុនេះគេត្រូវតែពិចារណាឲ្យបានម៉ត់ចត់ចំពោះខ្លួនឯង ។

Il y a des miroirs pour le visage; il n´y en a pas pour l´esprit. Il y faut donc suppléer par une sérieuse réflexion sur soi-même. ( Gracian )

១២១. មានតែទឹកចិត្តប្ដេជ្ញាសម្រាប់បំពេញករណីយកិច្ចមិនគ្រប់គ្រាន់ទេ គេត្រូវតែយល់ឲ្យច្បាស់នូវករណីយកិច្ចនោះថែមទៀត ។

Il ne suffit pas d´être disposé à faire son devoir, il faut le connaître.

១២២. គ្មានករណីយកិច្ចណាឥតប្រយោជន៍ឡើយ ហើយក៏គ្មានមនុស្សណាឥតប្រយោជន៍ដែរ ។ មុខការតូចតាច ក៏វាមានសារៈសំខាន់ដូចមុខការធំដុំដែរ ។

Rien n´est en vain; à plus forte raison nul être n´est en vain; les petites fonctions ont leur nées, site comme les grandes.

១២៣. គេអាចរស់នៅដោយពេញលេញ ដរាបណាគេរស់នៅសម្រាប់អ្នកដទៃជាច្រើនទៀត ។

On ne vit pleinement qu´en vivant pour beaucoup d´autres.

_H_

១២៤. តណ្ហាវានាំឲ្យយើងមានការយល់ច្រឡំ ពីព្រោះតណ្ហាវានាំឲ្យយើងផ្ដោតអារម្មណ៍តែទៅលើផ្នែកម្ខាងនៃបញ្ហាតែប៉ុណ្ណោះ វាពុំអនុញ្ញាតឲ្យយើងពិនិត្យគ្រប់ជ្រុងជ្រោយនៃបញ្ហានោះឡើយ ។

Les passions nous induisent en erreur parce qu´elles fixent toute notre attention sur un côté de l´objet qu´elles nous présentent et qu´elles ne nous permettent point de le considérer sous toutes ses faces. ( Helvétius )

១២៥. ការពេញចិត្តដែលបានមកពីការសងសឹក មានតែមួយរយៈពេលប៉ុណ្ណោះ, ការពេញចិត្តណាដែលបានមកពីការអនុគ្រោះ ទើបវាស្ថិតស្ថេរជាស្ថាពរ ។

La satisfaction que l´on tire de la vengeance ne dure qu´un moment, mais celle que l´on tire de la clémence est éternelle. ( Henri IV )

១២៦. កាលណាគេស្រលាញ់ គេមានអាទិទេពនៅក្នុងបេះដូង ជើងគេជាន់ដីហើយថ្ងាសគេទល់មេឃ ។

On a dieu dans le cœur, quand on aime, les pieds sur la terre et le front dans les cieux.

( Houssaye )

១២៧. សតិអារម្មណ៍អាចនឹងទទួលរងគ្រោះដោយអំពើលុកលុយ ។ ហើយអាត្ម័នរបស់យើងក៏មានគ្រោះចង្រៃ មានគំនិតអាក្រក់ ចូលមកបំផ្លិចបំផ្លាញនូវគុណធម៌របស់យើងដែរ ។

L´esprit peut subir des invasions. L´âme a ses vandas. Les mauvaises pensées qui viennent dévaster notre vertu. ( Victor Hugo )



១២៨. សម្រាប់មនុស្សកាចសាហាវ គ្មានសន្តិភាពជាមួយទេ ។

Il n´y a point de paix pour les méchants. ( Isaïe )

១២៩. ចូរអ្នកចែករំលែកចំណីអាហាររបស់អ្នកដល់អ្នកស្រេកឃ្លានផង, ចូរអ្នកហៅអ្នកក្រដែលគ្មានទីជម្រកជ្រកពួនមកក្នុងផ្ទះសម្បែងអ្នកផង ។ កាលណាអ្នកឃើញមនុស្សនៅខ្លួនទទេ ចូរអ្នកផ្គត់ផ្គង់សម្លៀកបំពាក់ឲ្យគ្នាគ្របដណ្តប់ផង ហើយអ្នកមិនត្រូវមាក់ងាយដល់សាច់ឈាមផ្ទាល់របស់អ្នកទេ ។

Faites part de votre pain à celui qui a faim, et faites entrer dans votre maison les pauvres qui ne savent où se retire; lorsque vous verrez un home nu, revêtez-le, et ne méprisez point votre propre chair.

**_J_**

១៣០. ការសប្បាយរីករាយ និងការឈឺចាប់របស់មិត្តយើងត្រូវតែក្លាយជាការសប្បាយរីករាយ និងការឈឺចាប់របស់យើងដែរ ។ ទាំងនេះគឺជាកូនចិញ្ចឹមរបស់យើង ។

La joies les peines de notre ami doivent devenir nos joies et nos peines. Ce sont nos enfants d'adoption. ( James )

១៣១. កម្មវត្ថុនៃការអប់រំពុំមែនដើម្បីបង្កើតគ្រឿងម៉ាស៊ីនទេ គឺដើម្បីបង្កើតជាមនុស្ស ។

L'objet de l'éducation n'est pas de faire des machines, mais des personnes. ( Janet )

១៣២. ការពិតនឹងនាំមកឲ្យអ្នកនូវសេរីភាពពិតប្រាកដ ។

La vérité vous apportera la vraie liberté. ( Jésus Christ )

១៣៣. កូនក្មេងវាត្រូវការ គំរូជាងការទិទៀនរិះគន់ ។

Les enfants ont plus besoin de modèles que de critiques.

១៣៤. ដើម្បីឲ្យពលិកម្មមានតម្លៃ ពលិកម្មនោះត្រូវធ្វើដោយស្ម័គ្រចិត្ត និងប្រកបដោយសតិសម្បជញ្ញៈ ។ អំពើទាំងឡាយរបស់មនុស្សម្នាក់ជារបស់មនុស្សនោះ កាលណាគេចង់ធ្វើ ។

Pour que la sacrifice soit méritoire, il faut qu'il soit volontaire et conscient. Les autres d'un

Être ne lui appartient que s´il le veut.

**-K-**

១៣៥. តើវត្ថុបំណងណាដែលអាចក្លាយជាករណីយកិច្ចផង ហើយជាវត្ថុបំណងផង ? គឺជាការខិតខំប្រឹងប្រែងខ្លួនឯង ហើយនិងបរមសុខនៃអ្នកដទៃ ។

Quels sont les buts qui sont en même temps des devoirs ? Ce sont les perfectionnements de nous-même et les félicitées des autres. ( Kant )

១៣៦. រៀបអាពាហ៍ពិពាហ៍ដោយគ្មានស្នេហា គឺជាថ្ងៃគ្មានពេលព្រលឹម ។

Le mariage sans l´amour, c´est le jour sans l´aurore. ( Karr )

១៣៧.ត្រូវដាក់ករណីយកិច្ចមុនអ្វីទាំងអស់ ហើយត្រូវដាក់លទ្ធផលផ្លែផ្កាដែលបានទទួលនៅជួរបន្ទាប់ ។

Il faut placer avant tout le devoir, et ne mettre qu´au second rang le fruit qu´on en obtient.

១៣៨. ចូរអ្នកជៀសវាងមួយរយៈពេលនូវមនុស្សមានកំហឹង តែជៀសវាងរហូតនូវមនុស្សកុហកបោកប្រាស់ ។

Fuis pour un moment l´homme coléreux et pour toujours l´homme dissimulé.

១៣៩. អំពើអាក្រក់ដែលយើងធ្វើចំពោះមនុស្សផងគ្នា វារត់តាមយើងដូចស្រមោលអន្ទោលតាមប្រាណអ៊ីចឹង ។

Les maux dont nous affligeons notre prochain nous pour suivent ainsi que notre ombre suit notre corps.

-L-

១៩០. សេចក្តីស្លាប់មានតែម្តងទេ ក៏ប៉ុន្តែវាតាមគំរាមយើងគ្រប់ពេលវេលា ។ ដូច្នេះឃើញថាការភ័យខ្លាចស្លាប់ វាលំបាកជាងការយល់ព្រមទៅទៀត ។

La mort n´arrive qu´une fois et se fait sentir à tous les moments de la vie: i lest plus dur de l´appréhender que de la souffrir. ( La Bruyère )

១៩១. សេចក្តីអផ្សុករាតត្បាតមនុស្សលោកដោយសារការកំជិល ។

L´ennui est entré dans le monde par la paresse.

១៩២. បើសភាពថ្លៃថ្នូរជាគុណធម៌ នោះវានឹងត្រូវសាបសូន្យដោយសារអ្វីដែលមិនមែនជាគុណធម៌ ។ សភាពថ្លៃថ្នូរនឹងគ្មានតម្លៃអ្វីទាំងអស់ បើវាមិនមែនជាគុណធម៌ ។

Si la noblesse est vertu, elle se perd pas ton ce qui n´est pas vertueux; si elle n´est pas vertu, c´est peu de chose.

១៩៣. ការយកចិត្តទុកដាក់សំភីរកមើលតែកំហុសអ្នកដទៃពេកទៅ នាំឲ្យយើងភ្លេចមើលកំហុសយើងដល់ថ្ងៃស្លាប់ ។

Le trop d´attention qu´on met à observer les défauts d´autrui fait qu´on meurt sans avoir eu le temps de connaître les siens.

១៩៤. ក្រោយពីធ្វើការសង្កេតនិងពិនិត្យសិក្សាជាច្រើនឆ្នាំ ទើបបង្កើតបានជាការទិទានរិះគន់មួយ ។ រីអ្នកចាំតែធ្វើការទិទានវិញ មានតាំងពីល្ងាចទើសព្រឹក ។

Un critique n´est formé qu´après plusieurs années d´observation et d´étude. Un critiqueur naît du soir du matin.

១៩៥. មនុស្សកាចសាហាវក៏ដូចជាសត្វរុយដែលចេះតែហោលក្រវែលខ្លួនមនុស្ស ហើយនិងទំតែនៅលើមុខតំបៅប៉ុណ្ណោះ ។

Les méchants sont comme les moches qui parcourent le corps d´un home et ne s´arrêtent que sur ses plaies.

១៩៦. ចង់បំភ្លេចអ្នកណាម្នាក់ គឺនឹកគិតដល់អ្នកនោះហើយ ។

Vouloir oublier quelqu´un, c´est y penser.

១៩៧. មានរឿងដ៏អាម៉ាស់មួយបែប គឺក្នុងពេលសប្បាយរីករាយហើយ ស្រាប់តែមើលឃើញនូវប្រការវេទនាខ្លះៗ ។

Il y a une espèce de honte d´être heureux à la vue de certaines misères.

១៩៨. មនោសញ្ចេតនានាំឲ្យមានប្រយោជន៍ដល់ការសម្តែងយោបល់ គឺពីព្រោះតែហេតុនេះហើយបានជាមនុស្សឆ្កួតចេះតែធុញថប់ជានិច្ច ដោយសារគ្នាមិនបានទទួលនូវមនោសញ្ចេតនាអ្វីទាំងអស់ ។

Le sentiment donne du prix à l´expression: et ce qui fait que les sots sont toujours ennuyeux, c´est qu´ils ne sentiment jamais.

១៩៩. ត្រូវសើចមុននឹងសប្បាយ ប្រយ័ត្នស្លាប់ទៅមិនបានសើចនឹងគេ ។

Il faut rire avant que d´être heureux, de peur de mourir sans avoir rire.

១៥១. គេត្រូវការខ្លះនូវការគួរសមក្នុងអាកប្បកិរិយា ក៏ប៉ុន្តែគេត្រូវការច្រើននូវការគួរសមខាងផ្លូវគំនិត ។

Il faut très peu de fonds pour la politesse dans les manière; il en faut beaucoup pour celle de l'esprit.

១៥២. ទឹកចិត្តសប្បុរសពុំមែនបិតនៅលើការធ្វើអំណោយច្រើននោះទេ តែវាបិតនៅត្រង់ការធ្វើអំណោយឲ្យចំពេលវេលាដែលគេត្រូវការ ។

La libéralité consiste moins à donner beaucoup qu'à donner à propos.

១៥៣. ទម្លាប់និងការថ្មីថ្មោង វាជាវត្ថុពីរផ្ទុយស្រលះគ្នា ប៉ុន្តែវារំលឹកដាស់តឿនយើងជាមុន ។

Deux choses toutes contraires nous préviennent également, l'habitude et la nouveauté.

១៥៤. ស្មារតីនៃការសន្ទនា គឺបិតនៅត្រង់ទុកពេលឲ្យគេនិយាយបានច្រើនជាងយើងនិយាយ ។ កាលណាការសន្ទនាចប់ហើយ គូសន្ទនាជាមួយនឹងយើង គេសប្បាយចិត្តហើយពេញចិត្តនឹងយើងទៀតផង ។

L'esprit de la conversation consiste bien moins à en montrer beaucoup. Car en faire trouver aux autres: celui qui sort de votre entretien content de soi et de son esprit, c'est de vous parfaitement.

១៥៥. ប៉ាវព្រាវមានចៅហ្វាយតែម្នាក់ទេ ។ រីឯជនលោភលន់វិញ មនុស្សទាំងប៉ុន្មានដែលមានប្រយោជន៍ដល់ទ្រព្យសម្បត្តិរបស់គេ សុទ្ធតែចៅហ្វាយនាយគេទាំងអស់ ។

L'esclave n'a qu'un maître, l'ambitieuses en a autant qu'il y a des gens utiles â sa fortune.

១៥៦. មានតែបេះដូងទេ ដែលហើរលឿនដូចសត្វត្រចៀកកាំ ។

Il n'y a que le cœur qui aille aussi vite que les hirondelles.

១៥៧. មានសេរីភាពគឺបានធ្វើម្ចាស់ដោយខ្លួនឯង ។

Etre libre, c´est se posséder soi- même. ( Lacordaire )

១៥៨. មនុស្សយើងអនុគ្រោះឲ្យខ្លួនយើងគ្រប់កំហុសទាំងឡាយ ក៏ប៉ុន្តែមិនចូលចិត្តអត់ឱនកំហុសឲ្យអ្នកដទៃឡើយ ។

Nous nous pardonnons tout et rien aux autres homes.

១៥៩. រាប់លានស្មៅបង្កើតបានជាវាលស្មៅ ។ រាប់លានគ្រាប់ខ្សាច់បង្កើតបានជាភ្នំ ។ មហាសមុទ្រកើតឡើតដោយសារដំណក់ទឹក ។ ចំណែកជីវិតមនុស្សកើតឡើងពីនាទី និងវិនាទីទៅ ។

Un million de brins d´herbes, ça fait un pré. Des millions et des millions de grains de sables, ça fait un montagne. L´océan est fait dégouttes d´eau. La vie est faite de minutes. ( La martine )

១៦០. យើងវិនិច្ឆ័យសម្រស់នៃស្ត្រី ពុំមែនត្រូវពិនិត្យមើលនូវរាងរូវនៃខ្លួនប្រាណទេ គឺត្រូវចាប់អារម្មណ៍ចំពោះការទាំងឡាយដែលនាងនោះបានបញ្ចេញមក ។

On doit juger de la beauté d´une femme, non par les proportions du corps, mais par l´effet qu´elle produit. ( Lambert )

១៦១. ឧត្តមគតិដែលខ្លាំងបំផុតគឺការស្គាល់ចំណុចខ្សោយរបស់ខ្លួនឯងឲ្យបានច្បាស់លាស់ ។

L´esprits le plus fort est celui qui connaître le mieux sa faiblesse. ( Lamernnais )

១៦២. យើងសន្យាអ្វីមួយ អនុទ្បោមទៅតាមសេចក្តីសង្ឃឹមរបស់យើង ហើយយើងនិងរក្សាពាក្យសន្យាទៅតាមការខ្លាចរបស់យើយ ។

Nous permettrons selon nos espérances, et nous tenons selon nos craintes.

( La Rochefoucauld )

១៦៣. មានតែខ្លួនយើងទេ ទើបមានសមត្ថភាពធ្វើឲ្យខ្លួនយើងមានឈ្មោះល្អឡើយវិញបាន ទោះបីពីគ្រាមុន អាក្រក់យ៉ាងណាក៏ដោយ ។

Quelque honte que nous ayons méritée, il est presque toujours en notre pouvoir de rétablir notre réputation. ( La Rochefoucould )

១៦៤. ការងារនៃខ្លួនប្រាណយើង វាសម្រាលនូវការហត់នឿយនៃខួរក្បាលហើយនិងធ្វើឲ្យមនុស្សក្រីក្ររស់នៅដោយសប្បាយផង ។

Le travail du corps délivre des peines de l´esprit. Et c´est ce qui rend les pauvres heureux.

១៦៥. ការបញ្ជើចបញ្ជើរ គឺជាប្រាក់ក្លែងក្លាយ វាមានតម្លៃតែដោយសារអំនួតរបស់យើងប៉ុណ្ណោះ ។

La flatterie est une fausse monnaie qui n´a cours que par notre vanité.

១៦៦. បើយើងមិនព្រមទទួលសារភាពនូវកំហុសទាំងឡាយដែលគេចង្អុលប្រាប់យើង គឺបានន័យថាយើងបន្ថែមកំហុសខ្លួនឯងទៅវិញទេ ។

C´est augmenter ses défauts que des désavouer quand on nous les reproche.

១៦៧. ចរិតលាក់ពុត គឺជាអំពើអាក្រក់មួយចំពោះគុណធម៌ ។

L´hypocrisie est un hommage que la vice rend à la vertu.

១៦៨. សងសឹកជាមួយនឹងមនុស្ស ដែលបំពានមកលើរូបយើង គឺយើងដាក់ខ្លួនយើងឲ្យស្មើនឹងសត្រូវ ។ បើអភ័យទោសឲ្យគេ គឺយើងលើកស្ទួយខ្លួនយើងខ្ពស់ជាងគេ ។

Se verger d´une offense, c´est de mettre au niveau de son ennemi ; la lui pardonner, c´est s´élever fort au- dessus de lui.

១៦៩. មនុស្សយើងមិនដែលសប្បាយខ្លាំងពេក ឬវេទនាខ្លាំងពេកដូចមនុស្សយើងនឹកស្មានក្នុងចិត្ត នោះឡើយ ។

On n´est jamais si heureux ni si malheureux qu´on se l´imagine.

១៧០. ទស្សនវិជ្ជាឈ្នះអំពើអាក្រក់ពីអតីតកាល និងតទៅអនាគតយ៉ាងងាយ ក៏ប៉ុន្តែអំពើអាក្រក់ក្នុង បច្ចុប្បន្ន វាឈ្នះទស្សនវិជ្ជាដោយងាយដែរ ។

La philosophie triomphe aisément des maux passés et des maux d´avenir, mais les maux présents triomphent d´elle.

១៧១. មានការសង្ស័យចំពោះមិត្តសំឡាញ់ល្អ វាអាម៉ាស់ជាងត្រូវមិត្តសំឡាញ់បោកប្រាស់ទៅទៀត។

Il est plus honteux de se défier de ses amis que d´en être trompé.

១៧២. មនុស្សម្នាក់ៗសុទ្ធតែរអ៊ូរទាំនឹងសតិបញ្ញារបស់ខ្លួន តែគេពុំដែលរអ៊ូរទាំនេងការវិនិច្ឆ័យរបស់គេ ទេ ។

Tout le monde se plaint de sa mémoire et personne ne se plaint de son jugement.

១៧៣.បើយើងគ្មានកំហុសណាមួយទេ យើងគ្មានការសប្បាយចិត្តបន្តិចបន្តួចឡើយក្នុងការរកកំហុស អ្នកដទៃ ។

Si nous n´avions point de défauts, nous ne perdrions pas tant de plaisir à en remarquer dans les autres.

១៧៤. មានពេលខ្លះគេល្ងង់ខ្លៅចំពោះសតិបញ្ញា ក៏ប៉ុន្តែគេពុំដែលល្ងង់ខ្លៅចំពោះការវិនិច្ឆ័យសោះ ឡើយ ។

On est quelquefois un sot avec de l´esprit, on ne l´est jamais avec du jugement.

១៧៦. មនុស្សយើងអាចមានប្រៀបជាងមនុស្សម្នាក់ទៀតបាន ក៏ប៉ុន្តែពុំអាចមានប្រៀបជាងមនុស្ស ទាំងអស់បានទេ ។

On peut être plus fin qu´un autre mais non pas plus fin que tous les autres.

១៧៦. រឿងជម្លោះទាំងឡាយ ពុំអាចនឹងស្ថិតស្ថេរនៅយូរអង្វែងបានឡើយ ប្រសិនបើកំហុសមានជ្រុង ជ្រោយតែម្ខាង ។

Les quenelles ne dureraient pas longtemps si le tort n´était que d´un côté.

១៧៧. សភាពពូកែនិយាយពិតប្រាកដ គឺការនិយាយឲ្យអស់សេចក្ដីនូវប្រការសំខាន់ ហើយនិងនិយាយ ឲ្យបានត្រឹមត្រូវទៀតផង ។

La véritable éloquence consiste à dire tout ce qu´il faut et à le dire comme il faut.

១៧៨. ប្រសិនបើយើងពុំអាចឆ្មើងឆ្មៃបាន យើងកុំគប្បីរិះគន់ចំពោះការឆ្មើងឆ្មៃនៃអ្នកដទៃ ។

Si nous n´avions point d´orgueil, nous ne nous plaindrions pas de celui des autres.

១៧៩. មានលក្ខណៈល្អច្រើនមិនទាន់គ្រប់គ្រាន់ទេ គឺត្រូវមានលក្ខណៈសន្សំសំចៃថែមទៀត ។

Ce n´est pas assez d´avoir de grandes qualités : il en faut avoir l´économie.

១៨០. មនុស្សយើងកើតឡើង សម្រាប់ជួយគ្នាទៅវិញទៅមក ដូច្នេះត្រូវបង្រៀនគ្នា ឬជួយគាំទ្រគ្នាទៅវិញទៅមក ។

Les homes sont nés  les uns pour les autres : il faut donc les instruire ou les supporter.

( Lebon )

១៨២. បង្ហាញវត្ថុមួយថាសមហេតុផល មិនមែនបានសេចក្ដីថា វត្ថុនោះសុទ្ធតែស្របហើយត្រូវនឹងការពិតនោះទេ ។

Démontrer qu´une chose est rationnelle ne prouve pas toujours qu´elle soit raisonnable.

១៨៣. ចំណេះដឹងបង្កើតបាននូវការពិត ជំនឿមានឥទ្ធិពលទៅលើចំណង់របស់យើង ។ គឺហេតុដូច្នេះហើយបានជាមនុស្សចូលចិត្តជំនឿជាងការចេះដឹង ។

La connaissance établit des vérités, la croyance incarne nos désirs ; c´est pourquoi L´homme préféra toujours la croyance à la connaissance.

១៨៤. មានស្ដេចច្រើនណាស់ដែលដល់ពេលស្លាប់ ទើបនឹកស្ដាយថាខ្លួនបានចូលចិត្តសង្គ្រាម ហើយគេមិនសូវឃើញស្ដេចណាដល់ពេលស្លាប់នឹកស្ដាយថាខ្លួនបានចូលចិត្តសន្តិភាពសោះ ។

Plusieurs princes ont regretté à l´heure de la mort d´avoir aimé la guerre. Nous n´en voyons aucun qui se soit repenti d´avoir aimé la paix. ( Leckzinska )

១៨៥. គ្រូនិងសិស្សមានគ្រូរួមតែមួយ គឺសេចក្ដីស្រលាញ់គ្នា ។

Maîtres et élèves ont un maître commun : l´affection. ( Legouvé )

១៨៦. ចេះតែសសើរដដែលៗ គឺជាសញ្ញាមួយនៃការយ៉ាប់បំផុត ។

C′est un grand signe de médiocrité que de louer toujours modérément.( Leibnitz )

១៨៧. ការស្តាយស្រណោះសេចក្តីស្នេហា នៅបង្កើតបានសុភមង្គលនៅឡើយ ។

Les regrets de l′amour font encore le bonheur. ( Lermontov )

១៨៨. ពេលវេលាធ្វើឲ្យរិចរិលនូវការភ័ន្តច្រឡំ ហើយដុសខាត់ឲ្យលេចចេញនូវការពិត ។

Le temps use l′erreur et polit la vérité. ( Lévis )

១៨៩. ការនៅទំនេរជាច្រេះស្នឹមនៃដួងព្រលឹង ។ ការនៅទំនេរធ្វើឲ្យហត់នឿយដូចគ្នានឹងការសម្រាកស្ងៀមស្ងាត់ដែរ ។

L′oisiveté est la rouille de l′âme. L′oisiveté est aussi fatigante que le repos.

១៩០. ការអផ្សុកជាជម្ងឺដែលមានការងារជាថ្នាំរបស់វា ។ ចំណែកល្បែងកំសាន្តគ្រាន់តែមានប្រសិទ្ធភាពមួយគ្រាប៉ុណ្ណោះ ។

L′ennui est une maladie dont le travail est le remède. Le plaisir n′est qu′ un palliatif.

១៩១. ចំពោះសេចក្តីស្នេហា គេប្រៀបដូចទៅនឹងកំពូលភ្នំស្រួច កាលណាគេឡើងទៅដល់ហើយ គេចុះមកវិញភ្លាម ពីព្រោះនៅលើកំពូលភ្នំនោះគ្មានកន្លែងសំរាប់សម្រាកទេ ។

Il en est de l′amour comme de ces montagnes en forme de pie, dont le sommet n′offre point lieu de repos ; à peine monté, il faut descendre.

## - M -

១៩២. យើងមិនអាចអួតអាងថា បានស្គាល់ការពិតច្បាស់លាស់ទេ ដរាបណាយើងមិនទាន់យកការរស់នៅរបស់យើងទៅបញ្ចូលក្នុងការពិតនោះ ។

Nous ne pouvons-nous flatter d'avoir compris une vérité que lorsqu'il nous est impossible de n'y pas conformer notre vie. ( Maetterlinck )

១៩៣. សុភមង្គលវាប្រហាក់ប្រហែលគ្នាទៅនឹងសត្វទៀវ ទុក្ខឲ្យមនុស្សទៅជិតវា ហើយទើបវាលោតទៅទៀត ។

Le Bonheur est comme l'oiseau vert, qui se laisse approcher et puis qui fait un petit saut. ( Maistre )

១៩៤. មិនត្រូវធុញទ្រាន់ឬអស់សង្ឃឹមទេក្នុងពេលដែលអ្នកទទួលបរាជ័យ ។ អ្នកត្រូវចាប់ផ្តើមធ្វើសារជាថ្មីឡើងវិញ ។

Point de dégoût et de découragement ; si tu viens d'échouer, recommence.

( Mare-Aurèle )

១៩៥. មិត្តត្រូវប្រុងប្រៀបធ្វើពលិកម្មឲ្យស្រេច ដើម្បីបញ្ជាក់ថាមិត្តចេះហារស់នៅ ។

Sois prêt à donner la vie pour te justifier de vivre. ( Mercereau )

១៩៦. សេចក្តីសប្បាយខាងសម្ភារៈនាំឲ្យខ្លួនប្រាណនឿយហត់ រីងរៃ ស្គមស្គាំង សាហាវយ៉ាងសម្បើម ។ ចំណែកឯការសប្បាយខាងផ្លូវចិត្តវិញ វានាំឲ្យព្រលឹងយើងក្មេង សម្បូរណ៍សប្បាយ និងថ្លៃថ្នូរ ។

Les plaisirs du corps le fatiguent, l'épuisent, l'écœurent, le rendent stérile et cruel, ceux de l'âme la rajeunissent, la rende fertile et généreux.

១៩៧. កិត្តិយសនៃស្រីក្រមុំបិតលើខ្លួនឯងអ្នកវិនិច្ឆ័យ ហេតុនេះស្រីក្រមុំត្រូវពិចារណាឲ្យមែនទែន ។ រីកិត្តិយសស្ត្រីមានប្តីវិញ បិតនៅលើប្តីវិនិច្ឆ័យ ហេតុនេះគេពុំសូវពិចារណាប៉ុន្មានទេ ។

L´honneur d´une fille est-elle: elle à y regarde à deux fois, L´honneur d´une femme est à son marie : elle y regarde moins. ( Mercier )

១៩៨. ចំកួតរបស់ស្ត្រីក៏ជាចំកួតរបស់បុរសដែរ ។

Tout folie de la femme est une sotties de l´homme.

១៩៩. គេមិនគ្រាន់តែស្រាវជ្រាវការពិតប៉ុណ្ណោះទេ គឺត្រូវរស់នៅជាមួយការពិតនោះទាំងស្រុងទៀត ។

Il ne s´agit pas seulement de découvrir la vérité, mais de vivre avec elle toute entière.

( Mithouard )

២០០. ប្រសិនបើគ្មានគុណធម៌នៅក្នុងខ្លួនសោះនោះទេ កំណើតកើតមកក៏ឥតប្រយោជន៍ដែរ ។

La naissance n´est rien où la vertu n´est rien.

២០១. អ្នកប្រាជ្ញឆ្កួតយ៉ាប់យ៉ឺនច្រើនជាងមនុស្សឆ្កួតហើយល្ងង់ ។

Un sot savant est plus sot qu´un sot ignorant. ( Molière )

២០២. កាលណាយើងគ្មានវត្ថុបំនងច្បាស់លាស់ ព្រលឹងយើងវាអណ្តែតអណ្តូងខ្លាំងណាស់ ។

L´âme qui n´a pas de but stable, elle se perd.

២០៣.ច្បាប់ត្រូវទុកដូចជាមច្ចុរាជ ពីព្រោះវាមិនដែលយោគយល់អ្នកណាម្នាក់ឡើយ ។

La loi doit être comme la mort qui n´épargne personne. ( Montesquieu )

២០៤. អយុត្តិធម៌ចំពោមនុស្សម្នាក់ នឹកក្លាយទៅជាការគំរាមកំហែងចំពោះមនុស្សទូទៅ ។

Une injustice faite à un seul devient une menace pour tous.

២០៥. អនាគតរបស់កូនគឺជាភារកិច្ចរបស់ម្ដាយរបស់វា ។

L´avenir d´un enfant est toujours l´ouvrage de sa mère. ( Napoléon )

២០៦. ការទន់ជ្រាយ និងកាតអត់ឱនចំពោះខ្លួនឯង ហើយនិងតឹងតែងចំពោះអ្នកដទៃ គឺជាកំហុសតែមួយដូចគ្នា ។

La mollesse et l´indulgence pour soi-même et la dureté pour les autres n´est qu´un seul et même vice. ( Nicole )

**- P -**

២០៧. សតិសម្បជញ្ញៈគឺជាសៀវភៅចរិយាសាស្ត្រដ៏ល្អបំផុតរបស់យើង សៀវភៅនេះហើយដែលគេត្រូវសាកសួរឲ្យបានច្រើននោះ ។

La conscience est le meilleur  livre de morale que nous ayons: c´est celui que l´on doit consulter le plus. ( Pascal )

២០៨. នៅក្នុងការលេងសម្ដី យើងត្រូវឲ្យមានការសប្បាយនិងការពិត ក៏ប៉ុន្តែការសប្បាយនោះត្រូវឲ្យមានលក្ខណៈប្រាកប្រជាផង ។

Il faut qu´il y ait dans l´éloquence de l´agréable et réel mais il faut que cet agréable soit réel. ( Pascal )

២០៩.យើងមិនត្រូវប្រមាណមើលគុណធម៌របស់មនុស្សម្នាក់ តាមការប្រឹងប្រែងរបស់គេទេ គឺត្រូវថ្លឹងមើលតាមសកម្មភាពធម្មតារបស់គេវិញ ។

L vertu d´un home ne doit pas se mesurer par ses efforts, mais par ce qu´il fait d´ordinaire.

២១០. គ្រប់ការប្រឹងប្រែងនៃអំពើពាលទាំងអស់ ពុំអាចបន្ថយសភាពពិតបានឡើយ នៅទីបំផុត ការពិតនឹងឈ្នះគូសត្រូវរបស់វា ។

Tous les efforts de la violence ne peuvent affaiblir la vérité qui triomphe enfin de ses ennemies.

២១១. មិនត្រូវឲ្យមានមនោសញ្ចេតនានៅក្នុងចិត្តផ្សេង ហើយនៅលើបបូរមាត់ផ្សេងនោះទេ ។

N'aie point un sentiment dans son cœur, un autre sur tes lèvres. ( Phocylide )

២១២. អ្នកចង់ស្គាល់មនុស្សម្នាក់ឬ? ចូរអ្នកបញ្ចុះបញ្ចូលគេពីឥទ្ធិពលដ៏ធំធេងមួយទៅ ។

Voulez-vous connaître un homme ? Revête- le d'une grande puissance. ( Pittacus )

២១៣. មនុស្សយើងអាចមានសេរីភាពបាន ដោយសារការរំងាប់នូវតណ្ហាអាក្រក់ទាំងឡាយឲ្យអស់ ។

L'homme peut devenir libre par l'anéantissement des mauvaises passions. ( Plotin )

២១៤.សត្រូវក៏មានប្រយោជន៍ដែរ គឺវាបង្ហាញប្រាប់ពីកំហុសរបស់អ្នក ហើយវានិយាយការពិតប្រាប់អ្នក ។ ទាំងនេះហើយ ជាគ្រូដែលគេពុំបាច់ជូលឲ្យអស់ប្រាក់ ។

Les ennemis ont leur utilité : ils vous montrent vos fautes ; ils vous disent des vérités. Ce sont des maitres qu'on ne paie pas.

២១៥. បើមិត្តមានការសង្ស័យ ចូរអ្នកតមកុំធ្វើអ្វីទាំងអស់ ។

Dans le doute, abstiens-toi. ( Pythagore )

២១៦. ប្រសិនបើគេយកមនុស្សកាចសាហាវមកធ្វើជាគំរូ ហើយយកមនុស្សសុចរិតត្រឹមត្រូវធ្វើជាត្លុកកំប្លែង នោះប្រាកដជាខូចការអស់ហើយ ។

Tout est perdu quand les méchants servent d´exemple et les bons de risée.

២១៧. នៅក្នុងការទាក់ទងនៅក្នុងសង្គម ចូរអ្នកចៀសវាងកុំធ្វើឲ្យមិត្តក្លាយជាសត្រូវ ។ ផ្ទុយទៅវិញចូរអ្នកប្រឹងប្រែងធ្វើឲ្យសត្រូវមកក្លាយជាមិត្ត ។

Dans les relations sociales, évite de changer tes amis en ennemis. Efforce toi, au contraire de changer tes ennemis en amis.

**- R -**

២១៨. អនុស្សាវរីយ៍ និងសេចក្ដីសង្ឃឹមជាបងប្អូនភ្លោះពីរនាក់ ដែលតែងពឹងពាក់រាក់ទាក់រកគ្នាជានិច្ច ម្នាក់មើលពីក្រោយ ម្នាក់មើលខាងមុខ ។

Le souvenir est l´espérance sont deux frères jumeaux qui ne cessent de se tendre la main, quoique regardant l´un en arrière, l´autre en avant. ( Renan )

២១៩. ការមានអារម្មណ៍ល្អ គឺជាសម្រស់ដ៏ប្រសើរបំផុតនៅក្នុងជីវិត ។

La bonne humeur est le plus grande charme de la vie. ( Renan )

២២០. ចំណង់ដែលនិយាយចេញមកខ្លាំងៗ គឺជាការខុសឆ្គងជានិច្ច ។ ក៏ប៉ុន្តែគេត្រូវបារម្ភចំពោះចំណង់ដែលនៅស្ងាតស្ងៀម ។

L´envie qui parlent et qui crie est toujours maladroite ; c´est l´envie qui se qu´on doit craindre.

២២១. សេចក្ដីសង្ឃឹម គឺជាការខ្ចីបុលពីសុភមង្គល ។

L´espérance est un emprunt fait au bonheur.

២២២. មាសប្រៀបបានទៅនឹងព្រះអាទិត្យដែលរលាយក្រមួន ហើយនិងធ្វើឲ្យស្ងួតភក់ជ្រាំ មាសធ្វើឲ្យរីកចម្រើននូវព្រលឹងថ្លៃថ្នូរ និងធ្វើឲ្យចង្អៀតចង្អល់នូវទឹកចិត្តអាក្រក់ ។

L'or semble au solde qui fond la crie et durcit la boue, développe les grandes âmes et rétrécit les mauvais cœurs.

២២៣. គេត្រូវតែប្រើវិចារណញ្ញាណ ប្រយុទ្ធទប់ទល់នឹងមតិ ។

On ne doit combattre l'opinion que le raisonnement. ( Rivarol )

២២៤. មនុស្សរស់នៅដើម្បីពិចាណាអំពីអតីតកាល ត្អូញត្អែរអំពីបច្ចុប្បន្នកាល ហើយនិងបារម្ភចំពោះអនាគតកាល ។

L'homme passé sa vie à raisonner sur le passé, à se plaindre du présent, à trembler pour l'avenir.

២២៥. ជំនឿផ្តេសផ្តាស គឺជាគ្រោះថ្នាក់ដ៏ធំបំផុតចំពោះមនុស្សលោក ។ វាធ្វើឲ្យមនុស្សសាមញ្ញល្ងង់ខ្លៅ វាធ្វើទុក្ខអ្នកប្រាជ្ញ វាចងគ្រៀកប្រជាជាតិទាំងឡាយ ហើយនិងបណ្តាលឲ្យមានអំពើអាក្រក់គួរឲ្យខ្លាចរាប់ជំពូកនៅគ្រប់ទៅកន្លែងទាំងអស់ ។

La superstition est le plus terrible fléau du genre humain. Elle abrutit les simples, elle persécute les sages, elle enchaîne les nations, elle fait partout cent maux effroyables.

( Rousseau )

២២៦. ជំហានទីមួយឆ្ពោះទៅរកអំពើកុសល គឺការមិនធ្វើអាក្រក់ ។

Le premier pas vers le bien est de ne pas faire le mal.

២២៧. ការរៀនសូត្រខ្លួនឯងមានប្រយោជន៍បំផុត ហើយការសិក្សានៅសាលាគ្រាន់តែម៉ែត្រសម្រាប់វាស់ការរៀនសូត្រខ្លួនឯងប៉ុណ្ណោះ ។

L´étude la plus utile est celle de soi-même ; les peines et les travaux des écoles ne servent à cette dernière étude que comme de degrés.

២២៨. អត្តឃាតកម្ម គឺជាមរណភាពដោយលួចលាក់ និងយ៉ាងអាម៉ាស់ នេះជាចោរកម្មមួយចំពោះមនុស្សលោក ។

La suicide est une mort furtive et honteuse, c´est un vol au genre humain.

២២៩. នៅក្នុងសង្គមមនុស្ស គ្មានរដ្ឋណាមួយដែលថាគ្មានទាសកម្មនោះឡើយ ។

Il n´est pas d´état dans la société qui n´ait son esclavage.

**- S -**

២៣០. ខ្ញុំរកឃើញមានប្រការពីរយ៉ាង ដែលអាចឲ្យជីវភាពយើងសប្បាយរីករាយ គឺការកម្រឹតចំណង់របស់យើងឲ្យល្មម និងប្រើប្រាស់ទ្រព្យសម្បត្តិឲ្យបានល្អត្រឹមត្រូវ ។

Je ne trouve que deux choses qui puissent rendre la vie heureuse : la modération de ses désirs et le bon usage de la fortune . ( Saint Evemond )

២៣១. សភាពកោងឈ្លើយ មានលក្ខណៈដូចជាដង្កូវអើចឹង គេកាប់វាខ្ទេចខ្ទីជាដុំៗ ក៏ប៉ុន្តែដុំនីមួយៗនោះវាមានជីវិតសារជាថ្មី ហើយបានក្លាយជាដង្កូវថ្មីមួយ ។

L´orgueil est comme le ver, on a le couper en morceaux, chacun de ses morceaux reprend la vie de devient un nouveau ver. ( Saint-Martin )

២៣២. ចម្លើយស្លូតបូតអាចរំងាប់កំហឹងបាន ។ សម្តីរមុាំងរម៉ោករឹតតែដុតកំហឹងថែមទៀត ។

La réponse douce apaise la colère. La parole fâcheuse augmente la fureur. ( Salomom )

២៣៣.លទ្ធផលនៃកំហឹងវាដូចគ្នានឹងផ្ទះរលំ រលំទៅលើផ្ទះផ្សេងទៀត ក៏ផ្ទះនោះត្រូវវិនាសហិនហោច ខ្លួនឯងដែរ ។

Les effets de la colère ressemble à la chute d´une maison qui, en tombant sur une autre, se brise elle-même. ( Sénèque )

២៣៤.វិចារណញ្ញាណពូកែ បង្កើតបានជាចលនាខ្លាំង ។

Les puissantes raisons fort les puissantes actions. ( Shekespeare )

២៣៥. ចំពោះសេចក្តីស្នេហា ស្ត្រីមានចរិយាល្អឆ្លើយទេ ស្ត្រីមានចំណង់ក្នុងរឿងនេះឆ្លើយចា! ស្ត្រីចិត្ត សារ៉ាំឆ្លើយចាឬទេ ស្ត្រីសង្ហាមិនឆ្លើយចាឬទេ។

En amour, la femme vertueuse dit non ; la passionné, oui ; la capricieuse, oui ou non ; la coquette ; ni oui ou non.  ( Soulié )

២៣៦. បើរកសុភមង្គលវាពិបាក គឺមកពីយើងពិបាកធ្វើឲ្យមានសុភមង្គលតែម្តង ។

Si le Bonheur est si difficile, c´est que nous sommes trop difficiles en fait do bonheur.

( Stael )

២៣៧.មនុស្សលោកច្រើនលើកដៃវាយគេ ហើយកម្រលើកដៃសំពះគេណាស់ ។

Le monde a la main souvent levée pour frapper et rarement pour absoudre.  ( Stéphanie )

**- T -**

២៣៨. គោរពបុព្វបុរសដែលស្លាប់ទៅ មិនមែនផិតនៅត្រង់និយាយសរសើរនោះទេ គឺនៅលើការធ្វើតម្រាប់តាម ។

Ce n´est point par les louanges, c´est par l´imitation qu´il faut honorer les grands morts.

( Tacite )

២៣៩. ត្រូវការចេះដឹងធ្វើអ្វី បើអ្នកចេះដឹងសម្រាប់តែខ្លួនឯងម្នាក់នោះ ?

Qu´importe que tu sois instruit, si tu ne l´es que pour toi seul ? ( Thégnis de Mégare )

២៤០. អំពើអាក្រក់ វានាំឲ្យអ្នកប្រព្រឹត្តិមានការអន្តរាយខ្លាំងជាងអ្នកទទួលរងគ្រោះដោយអំពើអាក្រក់នោះទៅទៀត ។

Tout mal nuit plus à celui qui le commet qu´à celui qui le souffre. ( Thomas d´Aquin )

២៤១. អំពើអាក្រក់ពុំអាចបំបាត់អំពើអាក្រក់បានឡើយ ក៏ដូចជាភ្លើងពុំអាចយកទៅរំលត់ភ្លើងបានដូច្នេះដែរ ។

De même que le feu n´éteint pas le feu, le mal ne peut éteindre le mal. ( Tolstoi )

**- V -**

២៤២. ទឹកមុខញញឹមនៃអ្នកមានទុក្ខ វាមានការឈឺចាប់ខ្លោចផ្សាជាឃើញទឹកភ្នែករបស់គ្នាស្រក់ចុះទៅទៀត ។

Le sourire de ceux qui souffrent est plus douloureux à voir que leurs larmes. ( Valyère )

២៤៣. ជីវភាពល្អប្រសើរ គឺការស្រមៃនៃយុវជនដែលអាចសម្រេចបាននៅក្នុងវ័យចាស់ជរា ។

Une belle vie, c´est un rêve de jeunesse réalisé dans l´âge mûr.

- W -

២៩៤. ការបញ្ជោរលើកជើង ប្រៀបបានទៅនឹងប្រាក់ក្លែងក្លាយ គឺវាធ្វើឲ្យអ្នកដែលត្រូវគេបញ្ជោរក្រ រហោមរហាម ។

La flatterie est comme la fausse monnaie elle appauvrit celui qui la reçoit. ( Woillez )

**- X -**

២៩៥. យើងគប្បីសណ្តោសអភ័យទោសចំពោះកំហុសនៃអ្នកដទៃ ពីព្រោះការធ្វើបែបនេះ វានាំឲ្យអ្នកមានកំហុសមានមុខមានមាត់ ( កិត្តិយស ) ប្រសើរជាងការធ្វើទណ្ឌកម្ម ។

Soyons indulgents aux fautes d´autrui parce que le pardon est plus salutaire au coupable que le châtiment. ( Xénophon )

**- Y -**

២៩៦. ត្រូចសាកសួរនូវអតីតកាលរបស់អ្នក ។ ចម្លើយទាំងនេះបង្កើតបានការពិសោធន៍របស់អ្នក ។

Consultez vos  passes, les réponses sont les expériences.

**អនាមិក ៖ ANONYMAT**

១. បើគ្មានជំនួយពីឆន្ទៈព្យាយាមផងទេ គឺគ្មានអ្វីកើតឡើង ហើយនៅស្ថិតស្ថេរយូរអង្វែងបានឡើយ ។

Rien ne peut s´établir et durer sans le secours d´une volonté persévérante.

២. មនុស្សសម្តីតិចហើយមានរបៀបតាមធម្មតា គឺជាមនុស្សសកម្ម ។

L'homme sobre de parole est généralement l'homme d'action.

៣. ចូរមិត្តប្រកាសថា "ខ្ញុំចង់" ហើយមិនត្រូវចុះញ៉មឡើយ ។

Prononce: "Je veux"et ne cède point .

៤. សេចក្តីសង្ឃឹម គឺជាឆន្ទៈនៃមនុស្សខ្សោយ ។

L'espoir est la volonté des faibles.

៥. មានតែការពិតទេ ដែលអាចបង្រួបបង្រួមសតិអារម្មណ៍ឲ្យនឹងនបានុំចំណែកឯការភូតភរនិងការឆ្គាំឆ្គង នាំឲ្យដែសតិអារម្មណ៍ជ្រួលច្របល់ និងបែកខ្ញែកប៉ុណ្ណោះ ។

Il n'y a que la vérité qui puisse réunir les esprits. Le mensonge et l'erreur ne peuvent que les agiter et les diviser.

៦. សភាពរួសរាយ គឺជាគ្រឿងលំអរនៃសេចក្តីថ្លៃថ្នូរ សភាពឆ្មើងឆ្មៃវាស្របគ្នាតែនឹងទុក្ខវេទនារហោមរហាមប៉ុណ្ណោះ ។

L'affabilité est l'ornement de la grandeur, la fierté ne sied que dans l'infortune.

៧. សេចក្តីញញឹមនៃប្រជារាស្ត្រ ថ្លៃថ្នូរជាងសេចក្តីអនុគ្រោះនៃស្តេចទៅទៀត ។

Le sourire du people vaut mieux que la faveur des rois.

៨. ឱបច្រើនពេក រឹតមិនតឹងទេ ។

Qui trop embrasse, mal étreint.

៩. ពុំមានសុភមង្គលណាក្រៅពីសេចក្តីស្មោះត្រង់ឡើយ ។

Il n′y a pas de bonheur en dehors de la droiture.

១០. ភ្នែកមានពេលខ្លះ វានិយាយច្រើនជាងអណ្តាតទៅទៀត ។

Les yeux dissent quelquefois plus que la langue.

១១. ការបញ្ចើចបញ្ចើរប្រៀបបានទៅនឹងស្រមោច ។ វាមិនអាចឲ្យយើងធំឬ តូចបានទេ ។

La flatterie est comme l′ombre : elle ne vous rend ni plus petit.

១២. ឆ្មាមិននៅ កណ្តុរឡើងរាជ្យ ។

Quand le chat n′y est plus , les souris dansent.

១៣. សត្វត្រចៀកកាំមួយ មិនអាចធ្វើឲ្យទៅជានិទាឃរដូវបានឡើយ ។

Une hirondelle ne fait pas le printemps.

១៤. មិនទាន់មានផង តែភ័យខ្លាចគេប្លន់ ( មិនត្រូវលក់ស្បែកខ្លាឃ្មុំមុនពេលសម្លាប់វានោះទេ ) ។

Il ne faut pas vendre la peau de l′ours avant de l′avoir tué.

១៥. ស្រាល្អពុំចាំបាច់លើកឃីហោឃោសនាទេ ។

A bon vin point d′enseigne.

១៦. ដុំថ្មរមៀលមិនអាច កាន់ស្លែបានឡើយ ( ដូរកន្លែងច្រើនមិនល្អទេ ) ។

Pierre qui roule n′amasse pas de mouse.

១៧. នៅស្ងៀមបានន័យថាយល់ព្រមហើយ ។ ៗ

Qui ne dit mot consent.

១៨. លុយរកបានងាយ ចាយក៏ធូរ ។

Argent mal acquis, argent mal dépensé.

១៩. កុំវាយស្មានមនុស្សដោយសារលក្ខណៈខាងក្រៅ ។

Il ne faut pas juger des personnes sur l´apparence.

២០. បវរកញ្ញា ដល់ពេលចាស់ជរាក៏អាក្រក់ដូចគ្នា ( ទីបញ្ចប់នៃរបស់មួយពុំមែននៅឋិតថេរដូចពីដើមដំបូងឡើយ ) ។

La fin d´une chose ne répond pas au commencement.

២១. ស្រីរូបល្អ ក៏ល្អត្រឹមតែស្បែកដែរ ។

Une femme même belle, une simple peau.

២២. ចង់ធ្វើព្រះត្រូវទៅបួសសិន ។

Même pour devenir un bouddha, il faut d´abord commencer par le noviciat.

២៣. នរក និងឋានសួគ៌ ឋិតនៅក្នុងដួងចិត្តនៃមនុស្សយើង ។

L´enfer et le paradis sont dans les cœur des hommes.

២៤. ចិត្តមនុស្សប្រៀបបាននឹងកូនសេះគ្មានបង្ហៀរ មិនត្រូវបណ្ដោយវាទេ ។

Le cœur est comparé à un poulain indompté.

២៥. ក្នុងចំណោមនុស្សល្ងង់ អ្នកចេះតិចតួចអាចធ្វើអ្នកប្រាជ្ញបាន ( នៅស្រុកមនុស្សខ្វាក់ មនុស្សគមគឺជាស្តេច ) ។

Au pays des aveugles, les borgnes sont rois.

២៦. ឆ្ងាយពីភ្នែក ចិត្តក៏ឆ្ងាយដែរ ។

Loin des yeux loin du cœur.

២៧. បាត់មុខយូរ ចិត្តក៏កាន់តែរសាយ ។

Absent longtemps, bientôt oubliette.

២៨. ឆ្កែមួយព្រុសផ្តេសផ្តាស ហើយឆ្កែ១០០០០ ទៀតក៏ព្រុសតាមផ្តេសផ្តាសដែរ ។

Un chien aboyant pour rien, dix mille chiens suivent sont exemple.

២៩. ចាប់រុយនឹងទឹកឃ្មុំ មិនមែនចាប់ដោយសារទឹកខ្មេះទេ ។

On attrape plus de mouches avec du miel qu´avec vinaigre.

៣០. និយាយច្រើនគេមិនខ្លាច ។

Beaucoup de bruit pour rien.

៣១. ចិត្តល្អប្រសើរជាងសម្ផស្សល្អ ។

La bonté vaut mieux que la beauté.

៣២. កុំយកកំហែង ទៅទល់នឹងកំហាល់ ។

Ne rendez pas le mal pour le mal.

៣៣. មនុស្សណាត្រូវគ្នា គឺចិត្តថ្លើមដូចគ្នា ។

Qui se resemble s´assemble.

៣៤. ប្រាក់ជាមិត្តបំរើដ៏ល្អ ក៏ប៉ុន្តែជាចៅហ្វាយនាយដ៏អាក្រក់ ។

L´argent est un bon serviteur, mais un mauvais maitre.

៣៥. សូវឲ្យមានសត្រូវឆ្លាតវាងវៃ ជាជាងមានមិត្តល្ងង់ខ្លៅ ។

Mieux vaut un sage ennemi qu´un sot ami.

៣៦. ធ្វើមិត្តជាមួយមនុស្សទាំងអស់គឺគ្មានមិត្តជាមួយអ្នកណាទាំងអស់ ។

L´ami de tout le monde n´est l´ami de personne.

៣៧. អ្នកណាគិតតែពីខ្លួនពេក គ្មានមិត្តភក្តិទេ ។

Qui s´aime trop n´point d´anis.

៣៨. មិត្តភាពយូរឆ្នាំ មិនខ្លាចច្រេះស៊ីទេ ។

Vieille amitié ne craint pas de rouille.

៣៩. កុំយកពងមាន់ទៅផ្ញើរនឹងក្អែក ( មិនត្រូវយកឆ្កែចចកទៅបង្ខាំងទុកក្នុងក្រោលចៀមទេ ) ។

Il ne faut pas enfermer le loup dans la bergerie.

៤០. មនុស្សពូកែពុំចាំបាច់ប្រើអាវុធល្អទេ ។

A vaillant home, courte épée.

៩១. តម្លៃនៃស្រែ អនុឡោមតាមតម្លៃនៃមនុស្សភ្ជួរ ។

Tant vaut l'homme, tant vaut la terre.

៩២. ឲ្យតែរបស់ខ្លួនសុទ្ធតែល្អទាំងអស់ ។

A chaque oiseau, son nid est beau.

៩៣. ការប្រុងប្រយ័ត្នជាម្តាយនៃសេចក្តីសុខ ។

Prudence est la mère de sureté.

៩៤. ការរិះគន់ជាការងាយ តែសិល្បៈរិះគន់ជាការលំបាក ។

La critique est aisée, mais l'art est difficile.

៩៥. ធុងទទេរ គោះទៅលឺខ្លាំង ។

Ce sont les tonneaux vides qui font le plus de bruit.

៩៦. ធនធានវាសើចចំអកដាក់មនុស្សឆ្កួត ។

La fortune rit aux sots.

៩៧. ធនធានវាញញឹមដាក់មនុស្សអង់អាចក្លាហាន ។

La fortune sourit aux audacieux.

៩៨. អ្នកណាស្តាប់ជួងតែមួយ គឺស្តាប់សំលេងតែមួយ ។

Qui n'entend qu'une cloche n'entend qu'un son.

៤៩ អ្នកណាចង់បានសន្តិភាព ត្រូវរៀបចំសង្គ្រាម ។

Qui veut la paix, prépare la guerre.

៥០. គ្មានបានទទួលដំណឹង គឺជាដំណឹងល្អ ។

Pas de nouvelle, bonnes nouvelles.

៥១. បើមិនហ៊ានប្រថុយទេ គឺគ្មានបានការអ្វីទាំងអស់ ។

Qui ne risqué rien n´a rien.

៥២. ចង់ក្រវាងាយ ចង់មានវាពិបាក ( ចង់ដួលវាងាយ ចង់ក្រោកឈរវាពិបាក ) ។

Il est plus facile de tomber que de se relever.

៥៣. ការទៀងទាត់ជាសេចក្តីគួរសមរបស់ស្តេច ( ព្រោះស្តេចមិនសូវទៀងទាត់ទេ ) ។

L´exactitude est la politesse des rois.

៥៤. សន្សឹមកុំបំបោល ក្រែងពុំដល់ដូចប្រាថ្នា ។

Rien ne sert de courir, il faut partir à temps.

៥៥. គ្មានអ្នកណាម្នាក់ថ្លង់ជាងមនុស្សដែលមិនចង់ស្តាប់នោះទេ ។

Il n´est pire sourd que celui qui ne veut pas entendre.

៥៦. គ្មានអ្នកណាខ្វាក់ជាងមនុស្សដែលមិនព្រមចង់មើលនោះទេ ។

Il n´est pire aveugle que celui ne veut pas voir.

៥៧. មនុស្សពីរនាក់មានមុខរបរដូចគ្នា មិនដែលត្រូវគ្នាសោះឡើយ ។

Deux homes de même métier ne s´entendent jamais.

៥៨. មុននឹងនិយាយ ត្រូវពិចារណាឲ្យច្បាស់ ។

Il faut tourner sept fois sa langue avant de parler.

៥៩. ក្នុងបណ្តាអំពើអាក្រក់ពីរ ត្រូវរើសយកមួយណាដែលស្រាលជាងគេ ។

De deux maux il faut choisir le moindre.

៦០. ច្បាប់តឹងតែង ប៉ុន្តែនេះគឺជាច្បាប់ ។

La loi est dure, mais c´est la loi.

៦១. សេចក្តីត្រូវការ វាគ្មានច្បាប់ទំលាប់ទេ ។

Nécessité n´a pas de loi.

១. បើឯងមាឧត្តូច កម្លាំងខ្សោយ ឯងត្រូវថ្កបានពាក្យសម្តី ។ ( ខ្មែរ )

២. កងទ័ពក្តាន់ រមាំង ដែលមានខ្លាមួយជាមេដឹកនាំ ខ្លាំងពូកែជាងទ័ពខ្លាដែលមានក្តាន់រមាំងមួយដឹកនាំ ។ ( ក្រិក )

៣. គ្មានជម្ងឺរាតត្បាតណាមួយខ្លាំងជាងសត្រូវដែលនៅរាក់ទាក់ជាមួយនឹងយើងទេ ។ ( អង់គ្លេស )

៤. ពេលវេលាតែងផ្លាស់ប្តូរជានិច្ច ។ មនុស្សយើងតែងផ្លាស់ប្តូរទៅតាមពេលវេលាជានិច្ច ។ ( ឡាតាំង )

៥. ទ្វារសប្បុរសធម៌ ពិបាកបិទនិងពិបាកបើកណាស់ ។ ( ចិន )

៦. ផឹកថ្នាំបំពុល ជាការងាយស្រួលជាងលើកដៃសុំទាន ។ ( ពៃក្ស )

៧. ពិភពលោកគឺជារបស់អ្នកដែលហ៊ាន ។ មេឃគឺជារបស់អ្នកដែលតតាំងប្រឆាំងនឹងមេឃ ។ ( បាស្គ៍ )

៨. អ្នកដែលពិនិត្យខ្យល់មិនបានសាបព្រោះទាល់តែសោះ ។ អ្នកដែលសូរពពក មិនបានផលច្រូតកាត់សោះឡើយ ។ ( គម្ពីរប៊ិប្ល៍ )

៩. សូវយកដុំថ្មទៅគរទុកឲ្យពេញផ្ទះអ្នក ប្រសើរជាងឲ្យជនបរទេសម្នាក់ទៅនៅ ។ ( ឥណ្ឌា )

១០. គេរៀនមេរៀនបានតិចណាស់នៅក្នុងជោគជ័យ ។ ក៏ប៉ុន្តែគេរៀនមេរៀនបានច្រើននៅក្នុងបរាជ័យ ។ ( ជប៉ុន )

១១. កំហុសដែលអាក្រក់សាហាវបំផុត គឺការមិនស្គាល់កំហុសទាំងនោះ ។ ( ឡាតាំង )

១២. អ្នកណាដែលចង់បានសេះគ្មានកំហុស ត្រូវដើរជើងទទេរ ។ ( បារាំង )

១៣. មិនមែនការពិចារណាទេដែលបង្រៀនមនុស្សឆ្វេសប្រហែស គឺការខូចខាតទាំងឡាយដែលបណ្តាលមកពីមនុស្សនោះធ្វេសប្រហែស ដែលជាអ្នកបង្រៀន ។ ( ក្រិក )

១៤. បើឯងមិនអាចធ្វើជាស្តេចបានទេ ឯងត្រូវធ្វើជាគ្រូពេទ្យ ។ ( ឥណ្ឌា )

១៥. បើគ្មានប្រាក់សម្រាប់ជូលទេ ស្បង់ក៏គ្មានដែរ ។ ( ក្រិក )

១៦. ក្នុងចំណោមគ្រូពេទ្យ ភាគច្រើនមានតែឈ្មោះ ។ ភាគតិចណាស់ដែលមានអំពើជាគ្រូពេទ្យ ។ ( ក្រិក )

១៧. អ្នកខ្លះហៅថាសេរីភាព ។ អ្នកខ្លះទៀតហៅថាការអនុញ្ញាត ។ ( បារាំង )

១៨. សេរីភាពគឺជាសិទ្ធិនឹងធ្វើអ្វីដែលច្បាប់អនុញ្ញាត ។ ( បារាំង )

១៩. សេរីភាពមិនមែនជាសិទ្ធទេ គឺជាកាតព្វកិច្ច ។ ( រុស្ស៊ី )

២០. កាលណាប្រទេសកាន់តែពុករលួយ ច្បាប់កាន់តែមានច្រើនឡើង ។ ( ឡាតាំង )

២១. ត្រូវយលច្បាប់ទៅបំភ្លឺឲ្យដឹងប្រវត្តិសាស្ត្រ ហើយត្រូវយកប្រវត្តិសាស្ត្រទៅបំភ្លឺឲ្យដឹងច្បាប់ ។ ( បារាំង )

២២. ទៅចុះនៅទីណាដែលឯងចង់ ស្លាប់ចុះនៅទីណាដែលឯងត្រូវស្លាប់ ។ ( បារាំង )

២៣. អ្នកណាដែលកើតសម្រាប់តែឲ្យគេយកទៅព្យួរក មិនស្លាប់លង់ទឹកទេ ។ ( អង់គ្លេស )

២៤. ភព្វវាសនាដាក់ម្រាមដៃពីរទៅលើភ្នែកមនុស្ស ម្រាមដៃពីរទៀតដាក់ទៅក្នុងត្រចៀកមនុស្ស នៅសល់ម្រាមមួយដាក់នៅលបបូរមាត់មនុស្ស ហើយនិយាយ ប្រាប់មនុស្សថា " នៅឲ្យស្ងៀមកុំមាត់ "។ ( អារ៉ាប់ )

២៥. បើឯងធ្វើអ្វីដែលឯងត្រូវធ្វើ ទុកឲ្យពួកលីលានិយាយទៅចុះ ។ ( ឡាតាំង )

២៦. ផ្លូវទៅកាន់ករណីយកិច្ចឋិតនៅជិតជានិច្ច ក៏ប៉ុន្តែមនុស្សភាគច្រើនទៅរកផ្លូវនោះនៅទីឆ្ងាយ ។ ( ចិន )

២៧. ត្រូវធ្វើអ្វីដែលឯងត្រូវធ្វើ មានរឿងរ៉ាវអ្វីក៏មានទៅចុះ ។ ( បារាំង )

២៨. អំពើពុករលួយរបស់វីរជន គឺជាអំពើពុករលួយដ៏កំណាចអាក្រក់បំផុត ។ ( ឡាតាំង )

២៩. កាលណាអំបិលឡើងពុករលួយហើយ អ្វីក៏ដោយក៏រលាយខូចអស់ដែរ ។ ( អារ៉ាប់ )

៣០. ទំនៀមទំលាប់កក់ក្តៅជាងច្បាប់ ។ ( ក្រិក )

៣១. សង្គ្រាមក្នុងស្រុកគឺជាសំណាងរបស់សត្រូវ ។ ( ឡាតាំង )

៣២. មានតែម្នាក់ឯងប្រសើរជាងមានគ្នីគ្នាដែលមិនល្អ ។ ( បារាំង )

៣៣. គេមិនប្រៀបធៀបមនុស្សទៅនឹងដំរីឡើយ ។ ( ក្រិក )

៣៤. អ្នកណាចង់បានសន្តិភាពត្រូវរៀបចំសង្គ្រាម ។ ( ឡាតាំង )

៣៥. ច្បាប់ធូរពេកគ្មានអ្នកគោរព ។ ច្បាប់តឹងតែងពេកគ្មានអ្នកណាអនុវត្តិ ។ ( អាមេរិកាំង )

៣៦. ការពិសោធន៍ គឺជាសាលារៀនមួយដែលមេរៀនគ្រប់បែបយ៉ាងធ្វើឲ្យចំណាយសាហ៊ុយច្រើនណាស់ ។ ( អ៊ីតាលី )

៣៧. អាណិតមេត្តាចំពោះសត្រូវ គឺគ្មានអាណោតមេត្តាចំពោះខ្លួនឯង ។

៣៨. ទំនៀមទំលាប់ជាស្តេចត្រួតត្រាលើពិភពលោក នៅស្ថានព្រះអាទិទេពក៏ដូចជាស្ថានមនុស្សលោកដែរ ។

៣៩. គេមិនអាចចង់បានអ្វីដែលគេមិនបានស្គាល់ឡើយ ។ ( ឡាតាំង )

៤០. គេតែងតែលោតចូលទៅក្នុងភ្លើងជារឿយៗដើម្បីគេចឲ្យផុតពីផ្សែង ។ ( ក្រិក )

៤១. ប្រាជ្ញាស្មារតីទន់ខ្សោយដែលមានអំណត់អត់ធន់ មានជោគជ័យជាងប្រាជ្ញាស្មារតីខ្ពង់ខ្ពស់បំផុតដែលគ្មានអំណត់អត់ធន ។ ( អេស្ប៉ាញ៉ុល )

៤២. គ្មានទ្រឹស្តីឯណាប្រសើរជាងការស្នេហាជាតិមាតុភូមិរបស់ខ្លួនឡើយ ។ ( ភាសិតសកល )

៤៣. បើឯងយល់ថាជាករណីយកិច្ចពិតប្រាកដមែន ឯងត្រូវហ៊ានធ្វើ ។ ករណីយកិច្ចណាដែលនាំឲ្យឯងស្លាប់ ឯងត្រូវតែហ៊ានស្លាប់ ។ ( ភាសិតសកល )

៤៤. កុំស្លូតពេកប្រយត្ន័គេលេប ។ កុំល្វីងជូរចត់ពេក ប្រយត្ន័គេខ្ជាក់ស្តោះចោល ។ ( អារ៉ាម៉េ )

៩៥. អ្នកណាដែលចង់ធ្វើទេវតា ត្រូវតែធ្វើសត្វតិរច្ឆាន ។ ( បារាំង )

៩៦. អ្វីដែលឯងដឹង កុំនិយាយទាំងអស់ឲ្យសោះ ។ អ្វីដែលឯងលឺ កុំជឿទាំងអស់ឲ្យសោះ ។ អ្វីដែលឯងអាចធ្វើបាន កុំធ្វើទាំងអស់ឲ្យសោះ ។ ( ព័រទុយហ្គេ )

៩៧. នៅទីផ្សារមានស្បែកកូនចៀមលក់ច្រើនសន្ធឹកសន្ធាប់ជាងស្បែកចចក ។ ( ប៊ុលហ៉ារី )

៩៨. ដើម្បីឲ្យបានលុយច្រើន គ្មានអ្វីប៉ិនប្រសប់ជាងស្ត្រីឡើយ ។ ( ក្រិក )

៩៩. បើឯងមិនអាចចូលតាមទ្វារស្នេហាបានទេ ឯងត្រូវចូលតាមទ្វារលុយ ។ ( អារ៉ាប់ )

៥០. សំណើចជ្រៅ នាំឲ្យមានទឹកភ្នែក ។ ( ឡាតាំង )

៥១. គេមិនសម្រាតមនុស្សដែលស្រាតស្រាប់បានឡើយ ។ ( សាកល )

៥២. អ្នកដែលមានការពិសោធន៍ ស្គាល់បញ្ហាជាងអ្នកដែលចេះគន់គូរ ។ ( ឡាតាំង )

៥៣. ដំរីជើងបួនគង់មានភ្លាត់ អ្នកប្រាជ្ញចេះស្ទាត់គង់មានភ្លេច ។ ( ខ្មែរ )

៥៤. អ្នកកាសែតដែលតាំងខ្លួនជាអ្នកនិយាយមិនចេះខុស មិនមែនជាអ្នកកាសែតឡើយ ។ ( សាកល )

៥៥. គោលដៅមិនមែនសុទ្ធតែជាចំណុចសម្រាប់ទៅដល់នោះទេ ផ្ទុយទៅវិញ គឺជាចំណុចសម្រាប់ដើរសំដៅទៅរក ។ ( បារាំង )

៥៦. គេមិនយកអន្ទាក់ដដែលទៅចាក់ចចកដដែលនោះឡើយ ។ ( ក្រិក )

៥៧. បំណុលអ្នកក្រ ធ្វើឲ្យលឺខ្ទរខ្ទារណាស់ ។ ( ឥណ្ឌា )

៥៨. គេចឲ្យផុតពីផ្លែលំពែង ជាការងាយស្រួល ។ ក៏ប៉ុន្តែគេចឲ្យផុតពីផ្លែដាវសម្ងាត់ ជាការពិបាកក្រៃលែង ។ ( ចិន )

៥៩. បានឆ្លើយឆ្លងសម្តីផ្ទាល់មាត់ម្តង ប្រសើរជាងស្តាប់គេនិយាយអួតសរសើរពីវីរភាពនៃមនុស្សនោះមួយពាន់ដង ។ ( ខ្មែរ )

⋆ ⋆ ⋆